ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

## ឆ្នាំគម្រប់ពីរ

ខ្សែ ១១




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៨

ព. ស. ២៤៧១

អ្នកទទួលខុសត្រូវ ជុំ-មៅ

# បញ្ជីរឿង

# ប្រវត្តិព្រះពុទ្ធរូបពុទ្ធ

សាស្ត្រាចារ្យ សេដេស រៀបរៀងជាភាសាសៀម

## ព្រះស្នេហាសាទេព ក្រសេម

## បណ្ឌិត នៅព្រះរាជបណ្ណាល័យ កម្ពុជា

ប្រែមកជាភាសាខ្មែរ

(២)

ព្រះពុទ្ធដែលបានប្រទះក្នុងអាណាចក្រសៀម ចំណែកចែកចេញជាច្រើនពួកផងគ្នា តាមដែលបានស៊ើបសាវស្រាវរកបានសេចក្តីមកអំពីព្រះរាជពង្សាវតារសៀម គឺ :

ពួកទី ១ បែបព្រះបឋម (ឲ្យមើលរូបទី ២.៧)[១] ដែលហៅដូចនេះក៏ព្រោះរបស់ប្រភេទនេះច្រើន តែបានមកអំពីបរិវេណព្រះបឋមចេតិយ មានលក្ខណៈដូចគ្នានឹងរូបខ្នាក់ដែលបានប្រទះឃើញ នៅព្រះបឋមចេតិយ ព្រះពុទ្ធនៅព្រះបឋមចេតិយច្រើនតែជារូបគ្រាមហាបាដិហារ្យ ព្រះពុទ្ធនៅទីនោះជាន់ចាស់បំផុត ធ្វើឡើងប្រហែលជាកាលពុទ្ធសករាជ ៩៥០ ដល់ ១២៥០ គាថា យេ ធម្មា ។ ជាភាសាបាលី គេចារឹកដោយអក្សរគ្រឹន្ទ ឬជាអក្សរខមបុរាណ ។

ពួកទី ២ ព្រះពុទ្ធរូបបែបនៅគូហាមេល្វយូ (រូបទី ៧-៩) ព្រះពុទ្ធរូបបែបនេះសុទ្ធតែធ្វើដោយដីៈខាៈស្អិតែតាំងអស់ ពីពុទ្ធសករាជប្រហែលជា

---

១- រូបទាំងនេះចាស់ពេក បើនឹងយកមកធ្វើពុម្ពទៀតវិញ មិនបាន ។

១៤៥០-១៥៥០ មានរូបពោធិសត្វខាងប៉ែកមហាយានផង គាថា យេ ធម្មា ដែលចារឹកជាភាសាសំស្ក្រឹតចារឹកដោយអក្សរនាគរី ដែលគេប្រើនៅក្នុងប្រទេសឥណ្ឌាប៉ែកលើ ។

ពួកទី ៣ បែបខ្មែរ (រូបទី ១០-១១) បែបនេះកើតឡើងរួមសម័យជាមួយគ្នា នឹងបែបនៅជ្រោយមល្លៃយូ ឬថ្មីជាងគ្នាបន្តិចបន្តួច ដឹងបានដោយលក្ខណាការ និងគ្រឿងប្រដាប់ ដែលជារបស់ក្នុងលទ្ធិមហាយានជាមួយគ្នា ។

ពួកទី ៤ បែបសុខោទ័យ (រូបទី ១២-១៣) បែបនេះសាងប្រហែលជាក្នុងពុទ្ធសករាជ ១៧៥០-១៩៥០ ច្រើនតែជាក្នុងព្រះពុទ្ធរូបដើរ ឬដែលហៅថាព្រះលីលា ។

ពួកទី ៥ បែបអយុធ្យា (រូបទី ១៤-១៥) ជាបែបថ្មីមែនៗ តាមច្រើនមានព្រះពុទ្ធរូបមានកិរិយា និងឥរិយាបថតាមគ្រាផ្សេងៗ ។

ពួទី ៦ ព្រះគ្រឿងផ្សេងៗ បែបទី ១' ព្រះពុទ្ធនៅបប់មចេតិយ មានប្លែកគ្នាជា ២ បែបដែលចាត់ជាស្នាដៃឥណ្ឌា ក្នុងរជ្ជសម័យនៃព្រះចៅ-គុប្ត (ប្រហែលជាក្នុងពុទ្ធសករាជ ៩០០-១២០០) សឹងបានប្រទះឃើញក្នុងគូហានៃវត្តព្រះពុទ្ធសាសនាជាច្រើន (ពាក្យថា គូហា ក្នុងទីនេះ គឺគុហាដែលគេចោះថ្មភ្នំជារូង ហើយសាងព្រះស្តូប ឬព្រះចេតិយ បញ្ចុះព្រះពុទ្ធរូបទុកក្នុងទីនោះ) ។

អ្នកសិក្សាបុរាណគតិគួរសង្កេតមើលព្រះពុទ្ធរូបពុម្ព រូបទី ២ កាល

ពិនិត្យទៅហើយ នឹងឃើញព្រះពុទ្ធរូបនោះអង្គុយសំយុងព្រះបាទបែបយ៉ាងបាពាំង ឬបែបអង្គុយកៅអី មិនអង្គុយបត់ព្រះបាទដូចបែបប្រទេសបូព៌ា រូបឆ្លាក់ផ្សេង ៗ នៅក្នុងគុហាស្រុកអជន្តា ស្រុកកាន់ហេរី ស្រុកការ្លី ស្រុកអេល្លោរះ នឹងនៅតាមគុហាដែលជាវត្តព្រះពុទ្ធសាសនាដទៃ ៗ ទៀតទូទៅ ក៏សុទ្ធតែជាបែបអង្គុយសំយុងព្រះបាទទាំងអស់ រូបឆ្លាក់ចាស់ ៗ ដែលជីកទៅប្រទះឃើញនៅកំទ្បុងនគរបឋម និងព្រះពុទ្ធរូបប្រធានក្នុងវត្តយៃ ឬវត្តបឋមចេតិយ ក៏សុទ្ធតែជាបែបនេះដែរ ។

ម្យ៉ាងទៀតក្នុងគុហា ១ ដែលហៅថាគុហាឫសីខៅទូដំតាំងនៅខាងកើតទីក្រុមឿងនៃខេត្រកជបូរីរបស់សៀម មានព្រះពុទ្ធរូបឆ្លាក់ ១ អង្គនៅក្នុងគុហានោះ អង្គុយសំយុងព្រះបាទសម្តែងធម៌ដូចព្រះពុទ្ធរូបដែលបានពោលមកហើយ មានអក្សរចារឹកខ្លី ៗ ជាអក្សរសម័យពុទ្ធសករាជ ៩៥០-១១៥០ ប្រាប់ទុកថា រូបឆ្លាក់នេះជាស្នាដៃរបស់ឫសី អ្នកនៅក្នុងគុហានោះសាងក្នុងសម័យនោះសឹងមាននាមថា សមាធិគុត្ត កាលយើងត្រួត-ត្រាមើលមកដល់ត្រង់នេះ ក៏មានមូលហេតុល្មមនឹងកំណត់ថា ព្រះពុទ្ធរូបទី ២ និងព្រះប្រធានក្នុងវិហារវត្តព្រះបឋមចេតិយ មានសេចក្តីពាក់ទងគ្នាយ៉ាងម្តេចម្យ៉ាង ទាំងអាចនឹងកំណត់អាយុសម័យនៃព្រះពុទ្ធ ដែលមានលក្ខណៈដូចគ្នាបានថា កើតឡើងក្នុងសម័យពុទ្ធសករាជ ៩៥០-១ ៥០ ម្យ៉ាងទៀតព្រោះព្រះពុទ្ធអម្បាលនោះមានចារឹកគាថា យេ ធម្មា ដោយអក្សរក្នុងសម័យនោះ សឹងមានតួយ៉ាងនៅ ៗ រូបទី ៣ ខាងស្តាំ ។

ក្នុងសម័យនោះ មានសេចក្តីកត់ហេតុរបស់ចិនពោលទុកយ៉ាងច្បាស់លាស់ថា នៅជ្រោយមួយអន្លើរវាងស្រុកស្រីក្សេត្រ (របស់ភូមា) និងស្រុកឥសាណបុរី (របស់ខ្មែរ) មាននគរអាណាចក្រឈ្មោះ ទ្វារវតី ឯពាក្យថា ទ្វារវតី មកប្រាកដជាឈ្មោះក្រុងស្រីអយុធ្យា ដែលព្រះចៅអ៊ូថោងសាងឡើងកាលពុទ្ធសករាជ ១៨៩៣ តែចូលចិត្តបានថា ព្រះចៅអ៊ូថោងយកនាមចាស់មកប្រើហៅក្រុងដែលសាងថ្មី ។

ក្រុងទ្វារវតីចាស់នោះប្រហែលជាតាំងនៅស្រុកសុពណ្ណបុរី ឬស្រុកនគរបឋមឥឡូវនេះ កាលបើដូចនោះសោតគោងចូលចិត្តថា ព្រះពុម្ពសម័យព្រះបឋមចេតិយ ជាស្នាដៃរបស់អ្នកស្រុកទ្វារវតីសាងជាប្រាកដ ។

លំដាប់នេះនឹងពោលអំពីលក្ខណការ នៃព្រះពុម្ពនោះជាដូចម្តេច ព្រះពុម្ពនោះជារូបព្រះពុទ្ធអង្គ ដួនកាលគង់លើផ្កាឈូក នៅទងផ្កាមាននាគ ២ ស្ពួយឡើង ដួនកាលជារូបព្រះពុទ្ធអង្គមានព្រះពុទ្ធរូបឯទៀតជាច្រើនអង្គចោមរោម លក្ខណការនេះហៅថា មហាបាដិហារ្យ ដូចដែលពោលមកហើយខាងដើម ព្រះពុទ្ធរូបគ្រាមហាបាដិហារ្យនេះ ប្រាកដមានក្នុងប្រ-វត្តិព្រះពុទ្ធរូបគ្រប់ ៗ ប្រទេស ។

នឹងសម្តែងរឿងមហាបាដិហារ្យដោយសង្ខេប ដូចតទៅនេះ កាលព្រះបរមសាស្តាទ្រង់សម្តែងបាដិហារ្យបន្តិចបន្តួចក្នុងជាន់ដំបូង ហើយទ្រង់ហាមមិនឲ្យអ្នកឯណាទីមួយជាបព្វជិត ឬគ្រហស្ថឧបាសកឧបាសិកាយកតម្រាប់ធ្វើតាមក្នុងការដែលនឹងទរមានពួកតិរ្ថិយនិគ្រន្ថ ដោយសម្តែងឥទ្ធិ-

បាដិហារ្យឡើយ ព្រះអង្គទើបទ្រង់សម្តែងមហាបាដិហារ្យតាមពាក្យអាពធ-នារបស់ព្រះបាទបសេនទិកោសល ២ប្រការ ប្រការទី ១ ហៅថា យមកបាដិហារ្យគឺព្រះអង្គទ្រង់ដំណើរទៅមកលើអាកាសដោយឥរិយាបថផ្សេងៗ និងទ្រង់បណ្តាលឲ្យកើតជាអណ្តាតភ្លើង និងទឹកខ្យល់ ចេញអំពីសរីរព្រះ-អង្គ ទាំងភាគខាងលើនិងភាគខាងក្រោម ប្រការទី ២ គឺទ្រង់បណ្តាលឲ្យព្រះអង្គប្រាកដទៅសព្វទិសានុទិសក្នុងអាកាសវេហាស៍ និងគ្រប់ ៗ កន្លែងគ្រប់ ៗ អន្លើក្នុងទីជុំវិញ មានចំនួនច្រើនរាប់មិនគ្រប់ នៅវេលាកណ្តាលទីដែលព្រះរូបនិម្មិតរបស់ព្រះអង្គទៅប្រាកដ ព្រះអង្គទ្រង់សម្តែងធម៌ដោយព្រះអង្គឯង ក្នុងខណៈនោះវលាហកទេវបុត្រ បណ្តាលឲ្យកើតខ្យល់ព្យុះធំបោកបក់មកធ្វើឲ្យពួកតិរ្ថិយនិគ្រន្ថអប្បរាជ័យចាញ់ពាលទៅអស់ ក្នុងគ្រាមានពួកតិរ្ថិយនិគ្រន្ថប្រែចិត្តបានត្រឡប់ចូលរាប់អានព្រះពុទ្ធសាសនា មានចំនួនច្រើនឥតបើប្រមាណនាគណនាគ្រាប់ ។

នេះជាសេចក្តីសង្ខេបក្នុងរឿងមហាបាដិហារ្យ នៅមានរឿងដែលទាក់ទងគ្នាដោយព្រះពុទ្ធ មានយ៉ាងពិស្តារក្នុងក្បួនសំស្ក្រឹតឈ្មោះ (ទិវ្យា-វទាន) ទៀត ក្នុងក្បួននោះពោលថា ៗ

ក្នុងខណៈនេះ គឺខណៈដែលកំពុងធ្វើបាដិហារ្យ ព្រះដ៏មានបុណ្យទ្រង់រំពឹងដល់ការៈចិត្តនៃសត្វលោក មានធម្មតាមួយយ៉ាងត្រាទុកថា កាលព្រះពុទ្ធអង្គ ១ ណាទ្រង់រំពឹងដល់ការចិត្តនៃសត្វលោកហើយ បណ្តាសត្វលោកទាំងពួង រហូតដល់ស្រមោចកណ្តៀរមែងដឹងដល់ព្រះពុទ្ធរំពឹងនោះរាល់ ១

គ្រា ហេតុដូចនោះព្រះឥន្ទ ព្រះមហាព្រហ្មនិងទេវតាដទៃ ៗ ទើបគិតថា ព្រះពុទ្ធអង្គរំពឹងដល់ការចិត្តនៃសត្វលោកដោយបំណងអ្វីហ្ន៎ ក្នុងខណៈនោះ ទេវតាអម្បាលនោះ ក៏កើតសេចក្តីគិតឡើងក្នុងចិត្តថា ការដែលព្រះពុទ្ធអង្គទ្រង់រំពឹងដល់ការចិត្តនៃសត្វលោកនោះ ក៏គឺព្រះអង្គបំណងនឹងធ្វើនូវមហាបាដិហារនៅនគរសាវត្ថី ដើម្បីប្រយោជន៍ដល់សត្វទាំងឡាយ លុះគិតដូចនោះហើយ ព្រះឥន្ទ្រនិងព្រះមហាព្រហ្ម ព្រមដោយពពួកទេវតាជាបរិវារច្រើនសែនដែលដឹងការព្រះហឫទ័យព្រះដ៏មានបុណ្យ ទើបអន្តរធានបាត់មកអំពីវិមាននៃខ្លួន ៗ ទៅប្រាកដនៅចំពោះព្រះភក្ត្រព្រះបរមសាស្តា ព្រះមហាព្រហ្មនិងទេវតាទាំងឡាយដទៃ ៗ នាំគ្នាដើរប្រទក្សិណព្រះពុទ្ធអង្គ ៣ ជុំ ហើយចូលទៅថ្វាយបង្គំព្រះបាទយុគលដោយត្បូងរៀងរាល់អង្គ ហើយក៏ចូលទៅអង្គុយរៀងរាយជាខាងស្តាំនៃព្រះសាស្តា ឯព្រះឥន្ទ្រនិងទេវតាដទៃ ៗ កាលបានសម្តែងសេចក្តីគោរពពប់អានស្រេចហើយនាំគ្នាអង្គុយតាល់ជាខាងឆ្វេងព្រះបរមសាស្តា គ្រានោះស្តេចនាគ ២ ឈ្មោះនន្ទនិងឧបនន្ទ បាននិម្មិតជាផ្កាឈូក ១ មានត្របកផ្កាជាច្រើនពាន់ ធំប៉ុនកង់រថ ត្របកផ្កាបទុមអម្បាលនេះ សុទ្ធសឹងតែជាមាសទាំងអស់ ឯទងផ្កាជាពេជ្របិតទាំងអស់ ហើយទើបនាំផ្កាឈូកនេះ ចូលទៅថ្វាយព្រះបរមសាស្តា ៗ ស្តេចឡើងគង់ពែនព្រះភ្នែនលើត្របកផ្កានោះ ទ្រង់រំពឹងដល់ព្រះបារមីរបស់ព្រះអង្គហើយ ក៏ទ្រង់និម្មិតជាផ្កាឈូកបែបដូចគ្នានេះឡើង ផ្កា ១ ទៀតមានព្រះពុទ្ធអង្គគង់នៅខាងលើផ្កានោះដូចគ្នា ក៏

ប្រាកដជាព្រះពុទ្ធអង្គដេរដាសពាំងមុខពាំងខាងក្រោយ និងជុំ ៗ វិញ ព្រះអង្គជាច្រើនណាស់រាប់មិនអស់ ផ្សាយរហូតទៅដល់ជាន់អកនិដ្ឋ ជាពុទ្ធសភា ១ ដែលកើតអំពីព្រះពុទ្ធអង្គ ព្រះពុទ្ធនិម្មិតនោះ ៗ អង្គខ្លះបង្ក្រម អង្គខ្លះឈរ អង្គខ្លះអង្គុយ អង្គខ្លះផ្ទំ អង្គខ្លះទ្រង់បណ្តាលឲ្យកើតជាពន្លឺភ្លឺ អង្គខ្លះទ្រង់បណ្តាលឲ្យកើតជាអណ្តាតភ្លើង អង្គខ្លះទ្រង់បណ្តាលឲ្យកើតជាផ្គរបន្ទោរភ្លឺព្រាត ៗ ព្រះពុទ្ធនិម្មិតទាំងឡាយបានវិសជ្ជនាបញ្ហាផ្សេង ៗ ដែលកើតមានឡើងជាច្រើន ដោយព្រះគាថាទាំង ២ សឹងមាន:សេចក្តីដូចតទៅនេះ ៗ

ចូរលះយកវាសវិស័យ ហើយគប្បីបំពេញព្រហ្មចរិយក្នុងសាសនាព្រះពុទ្ធអង្គ ចូលទម្លាយសត្រូវពោលគឺមច្ចុរាជ បីដូចជាកុញ្ជរជាតិ (ដំរី) ទម្លាយខ្ទមដែលគេធ្វើដោយដើមអំពៅព្រៃដូចនោះ ៗ

បុគ្គលអ្នកប្រព្រឹត្តខ្លួនមិនចេញទៅក្រៅ ចាកពាក្យប្រដៅរបស់ព្រះពុទ្ធនិងរួចចាកសេចក្តីកើត និងសង្សារវដ្ត ហើយនឹងរំលត់ទុក្ខទាំងពួងបានបង់ដូចនេះ ៗ

ឯរូបពុម្ពនៅព្រះបរមចេតិយ បែបទី ២ ឃើញថាថ្មីជាងបែបទី ១ ដែលបានពោលមកហើយនោះ ទាំងគ្មានចារឹកអក្សរបុរាណជាគ្រឿងជួយសតិបញ្ញា នឹងបានកំណត់សម័យឲ្យត្រឹមត្រូវ ឬឲ្យជិតទៅបាន តែប្រាកដយ៉ាងច្បាស់លាស់ថា បើមិនជាស្នាដៃរបស់ខ្មែរពិតតែម្តង ក៏គង់ជាស្នាដៃលាយខ្មែរ ព្រះពុទ្ធរូបអង្គុយ រូបទី ៤ នោះ មានលក្ខណៈប្រហែល

និងរូបចម្លាក់របស់ខ្មែរបុរាណ ហើយឯកំពូលស៊ុមដែលប្រាកដនៅរូបជាតួយ៉ាង ៣ រូប (គឺរូបទី ៦ រូបកណ្ដាល រូបទី ៧ ខាងស្ដាំនិងខាងឆ្វេង) នោះជារូបប្រាសាទរបស់ខ្មែរស្មោះ ដូចដែលនៅនគរវត្ត មុនដែលប្រែកមកជាព្រះប្រាង្គណ៍សៀមគ្មានខុសត្រង់ណា ។

ព្រះពុទ្ធរូបពុម្ព ដែលគេបោះពុម្ពរួមគ្នា ច្រើនៗអង្គនេះ ចូលចិត្តថាគេធ្វើសំដៅគ្រាមហាបាដិហារ្យនោះឯង ឬធ្វើជំនួសរូបអតីតពុទ្ធអង្គ ១ សម្រាប់ ឬ ១ ឈុត លើសខ្លះខ្វះខ្លះ រូបអតីតពុទ្ធអង្គនេះ មានលក្ខណៈប្រហែលគ្នា និងរូបមហាបាដិហារ្យនោះណាស់ដែរ ។

បែបទី ២ ព្រះពុម្ពបែបទី ២ បាននិងព្រះពុម្ពផ្សេងៗ ដែលបានប្រទះឃើញក្នុងរូងគុហានៅទីជ្រោយមល្លៃយូ មានចំនួនច្រើន ដូចដែលបានពោលមកហើយ ព្រះពុម្ពអម្បាលនេះគេធ្វើដោយដីឆៅ ឬដីស្អិត ហើយហាលឲ្យឆ្អិនដោយកំដៅព្រះអាទិត្យបានមកពីវត្តហាន និងក្នុងខារក្នុងដែនមឿងត្រាំងខ្លះ បានមកពីក្នុងខុរមខាងមឿងជ័យាខ្លះ បានមកពីក្នុងអុកជុះ និងគុហាសវ័នមឿងព័ទលុងខ្លះ ក្រៅអំពីព្រះពុទ្ធរូបហើយនៅមានរូបព្រះពោធិសត្វ អវលោកិតេស្វរៈ ឬលោកេស្វរៈនៅជាមួយផង គាថា យេ ធម្មា ។ ដែលចារឹកមានតែជាភាសាសំស្ក្រឹតមួយយ៉ាង ភាសាបាលីគ្មានសោះឡើយ ទនេះធ្វើឲ្យមុខគួរជឿថា ពួកសប្បុរសជនអ្នកសាងព្រះពុម្ពបែបនេះ ជាអ្នកកាន់លទ្ធិប៉ែកមហា-

យានដោយពិតព្រះពុទ្ធដ៏មាននៅជ្រោយមល្ហៃយូ ថែបខ្លះដូចរូបចម្លាក់នៅស្រុកផ្សេង ៗ រវាងឥណ្ឌូនិងជ្វា រឿងនេះមិនចំឡែកប្លែកអស្ចារ្យអ្វីឡើយ ព្រោះអាណាចក្រប្រទេសស្រីវិជ័យ ដែលតាំងរាជធានីនៅស្រុកប៉ាលេមបាំង ក្នុងកោះសុមាត្រានោះ កាលពុទ្ធសករាជ ១១៥០-១៧៥០ បានពង្រាយអាណាខេត្តទៅដល់លើជ្រោយមល្ហៃយូ ខាងទិសលើរហូតដល់មឿងជ័យា រូបព្រះពោធិសត្វដ៏ល្អដែលក្រុមព្រះដំរុងរកជានុភាពបានប្រទះនៅមឿងជ័យានោះ ជាស្នាដៃវិចិត្ររបស់អាណាចក្រស្រីវិជ័យ ទាំងព្រះពុទ្ធថែបទី ២ នេះ ក៏ប្រហែលជាស្នាដៃយ៉ាងល្អបំផុតរបស់អាណាចក្រនេះមានចំនួនច្រើនណាស់ដែរ ។

(មានតទៅទៀត)



# អំពីលំនាំដើម

## ហេតុនៃការដែលបានស្គាល់ប្រាសាទអង្គរ

លោក វិកទ័រគោលូបែប

អគ្គលេខាធិការ នៅសាលាបារាំងសែសនាចុងបូព៌ាប្រទេស អធិប្បាយ

ក្រុមការ **ជុំ-ម៉ៅ** ធ្វើការនៅព្រះរាជបណ្ណាល័យ ប្រែជាភាសាខ្មែរ

(១)

ដែលបានឃើញអង្គរជាដំបូងនោះគឺក្នុងឆ្នាំ ១៦០០ អ្នកបួសម្នាក់នៅក្នុងក្រុមសាំងដូមីនិក ឈ្មោះគាប្រីយែល គ្វីរូគា នៅស្រុក ស័នអន្ទូនីអូ ក្នុងប្រទេសអាមេរិក ចារិកទុកក្នុងសៀវភៅមួយដែលបោះពុម្ពនៅស្រុកវ័ល្លាដូលីដ កាលក្នុង ១៦០៤ ថាមានទីក្រុង ១ បម្ដូកដែលពួកព្រានជាតិស្រុកអាយបានប្រទះឃើញ ក្នុងកណ្ដាលព្រៃខ្មែរក្នុងឆ្នាំ ១៥៧០ ជាទីក្រុង ដែលអស់ទាំងអ្នកស្រុកមិនដែលឃើញមិនដែលស្គាល់ នោះនៅលើដីទំនាប មាត់ទន្លេមកុងចម្ងាយ ១៧០ លើ គឺ ៦៨០ គីឡូម៉ែត្រ ពីសមុទ្រ ទឹកឡើងទឹងជោរជោបដល់ទីនោះ ដូចជាក្រុងក្វាដ័លគីវ៉ែ នៅស្រុក សេវិល ដែរ ក្រុងនោះសំណាកដៃដែលធ្វើសំខាន់ណាស់ ហើយមានតាំងកំផែងថ្មជុំវិញចំនួន ៤ លើ (១៦ គីឡូម៉ែត្រ) កម្រាស់ ៤ ប្រាស គឺ ៦ ម៉ែត្រ ៤៨ សង់ទីម៉ែត្រ កំពស់ ៥ ប្រាស គឺ ៨ ម៉ែត្រ ១០ សង់ទីម៉ែត្រ មានបន្ទោះជិតៗគ្នា ហើយរចនាជារូបដំរី ធ្លាបារ ខ្លាធំ សីហ ឥន្ទ្រី និង ខ្លែ ឃើញមានសិលាចារឹកជាច្រើនដែលមនុស្សមិនដែលដឹង

តាំងគេហស្ថានសុទ្ធតែថ្មដ៏ប្រសើរ ហើយចែកជាផ្លូវមានរបៀបរៀបរយល្អ ការងារនៃគេហស្ថានតាំងនេះសង្កេតមើលទៅត្រង់ទ្វារ ហប់នឹងបន្ទប់ហាក់ដូចជាថ្វីដៃជាតិ រ៉ូម៉ង់ ឃើញមានម៉ាស៊ីនទឹកនឹងប្រឡាយទឹកជាច្រើនសម្រាប់ការសំអាត ហើយឆ្ងាយៗពីគ្នាបន្តិចទៅ ឃើញមានវត្តនឹងទីក្រុងតាំងឡាយទៀត សេចក្តីអធិប្បាយពីអង្គរនេះ មានសេចក្តីមួយជាភាសាស្រុកអឺរ៉ុប ដែលជាសេចក្តីចាស់ជាងគេនោះ មានដូចជាចំណោទដែលគេប្រទះឃើញក្នុងឆ្នាំ ៩០០ ហើយដែលពួករកពង្សាវតារនិងក្បាច់អលង្ការណ៍ខំស្វះស្វែងរក ក្នុងជាន់នោះនគរខ្មែរមានទីក្រុងដែលកប់បាត់ទៅក្នុងព្រៃឥតមានដំណឹង ហើយពង្សាវតារក៏សាបសូន្យទៅក្នុងព្រៃធំនោះទៅ មានសេចក្តីកត់សម្គាល់ពីអង្គរ១ទៀតក្នុងឆ្នាំ១៦៧៨ដែលមានប្រយោជន៍ដូចសេចក្តីមុនដែរ សេចក្តីនោះអ្នកបួសជាតិបារាំងម្នាក់ឈ្មោះសេវ្រីយ បាននិយាយថា មានប្រាសាទ ១ ដ៏វិចិត្រចម្ងាយពីកន្លែងដែលខ្ញុំនៅចំនួន ៨ ថ្ងៃ ប្រាសាទនោះឈ្មោះអង្គ ជាប្រាសាទ ១ យ៉ាងធើតដូចប្រាសាទស័ងពៀរនៅក្រុងរ៉ូមដែរ សំអាងនេះឃើញប្រកបជាប្រាកដនឹងសៀវភៅដែលនិយាយពីសសរនឹងជញ្ជាំងអង្គរវត្ត ឯរឿងដែលចាស់ជាងគេនោះ បានធ្វើក្នុងឆ្នាំ ១៦០០ ។

សេចក្តីទាំងនេះ អធិប្បាយថាប្រាសាទនេះ នៅវេលាដែលគេបានឃើញហើយនឹងទៅជាកន្លែង ១ ដ៏ឧត្តម សម្រាប់អ្នកដំណើរ ។

គេមានដាំដើមពោធិ៍នៅទីនោះ គេបើកសេចក្ដីឯកចិត្តឲ្យខ្ញុំកំដរ គេផ្ដាក់នឹងផ្ទួលផ្ដុលរូបតាំងឡាយ ក្នុងកាលនោះប្រហែលជាមានផ្នួសផ្ដុលខ្លះ តែមិនសូវប្រសប់ហើយឃើញមានស្នាមខ្លះដល់សព្វថ្ងៃនេះ ជាក្រោយតពីសង្ក្រជសេរ្វីយនេះមក មិនដែលមានជាតិបារាំងណាម្នាក់និយាយអំពីទីក្រុងនេះឡើយ ហើយក្នុងវេលានោះទីក្រុងនេះហាក់ដូចជាក្រោកឡើងបន្តិចពីដំណេក កំប្រុះដេកសន្ធប់សន្ធិនទៅវិញ ឥតកម្រើក លុះដល់មកក្នុងកាលអ្នកដំណើរជាន់ក្រោយ ដែលខំរុកកនរកក្នុងឆ្នាំ ១៩០០ ទើបបានឃើញទីក្រុងនេះច្បាស់ឡើងវិញ ។

លោកហង់រីមូហុត មកដល់ក្នុងប្រទេសឥណ្ឌូស៊ិនក្នុងឆ្នាំ ១៨៥៨ លោកនេះជាអ្នកសង្វាតរុករកស្រុកប្រទេស បែបពួកសាកិម៉ង់ទីនពួកស៊ុសៀ បានចេញពីប្រទេសអឺរុបមកស្វែងសួរក្នុងអាកាសព្រៃភ្នំជាទីតាញ់ ដើម្បីខំរិះរកឥតនឿយណាយ លោកហង់រីមូហុតគ្មានធ្វើទុកក្នុងចិត្តថានឹងបានឃើញទីក្រុង ១ ដែលមិនស្គាល់ឡើយ ប៉ុន្តែលុះមកដល់ក្រោយហើយបានប្រទះឃើញប្រាសាទបាក់បែកក្នុងស្រុកខ្មែរ នោះក៏មិនរួញរានឹងខំប្រឹងពិនិត្យសង្កេតឲ្យច្បាស់ឡើយ គឺនៅវេលាដែលបានចូលទៅក្នុងខេត្តបាត់ដំបងដែលនៅជាខេត្តសៀមនៅឡើយ ទើបដឹងថានៅខាងកើតទន្លេសាប មានទីក្រុងបុរាណដែលបាក់បែកអន្តរាយ អ្នកបួសជាតិបារាំងម្នាក់ឈ្មោះ ស៊ីលវេស្រ្ត កំបានជូនដំណើរទៅនៅថ្ងៃ ២២ យ៉ាង

វិយេរ ១៨៦១ ពេលព្រះអាទិត្យរះ  លោកមូហុតបានប្រទះឃើញកំពូលប្រាសាទអង្គរវត្ត ក្នុងប្រជុំមែកឈើដែលមានវល្លិ៍ព័ទ្ធពន្ធទៅវិញទៅមក ៗ

សេចក្តីដែលអ្នកដំណើរនេះបានតែង  អំពីដែលបានមកមើលប្រា-សាទនោះ  គេមិនអាចនឹងមើលហើយឥតសេចក្តីសោមនស្សព្រឺព្រួចឡើយ  លោកនៅតែម្នាក់ឯងក្នុងព្រៃស្ងាត់  ហើយតាំងពីបារណាគិតគេសេចក្តីខ្ពង់ខ្ពស់អស្ចារ្យ  ដែលកន្លងមកហើយ  ប៉ុន្តែឯប្រាសាទបាក់បែកនីមួយ ៗ នោះ  មានជាការដែលពិបាកនឹងគិត  មានឮសព្ទជីវស្រែកពីចម្ងាយ  ហើយជួនកាលមានសត្វខ្លា  ក្រោកស្ទុះរត់ក្នុងព្រៃស្ងាត  នៅខាងក្រោយកំពែងឃើញដើមពោធិដែលដុះមកជាច្រើនឆ្នាំហើយ  មានស្លូកាន់នៅជាប្រក្រតី  ជួនកាលមានសត្វពស់ស្ទុះរត់មើលមិនទាន់  ឯមនុស្សជាតិស្រុកអាយ  ដែលអ្នកដំណើរនេះបានសួរពតិមានអំពីប្រា-សាទទាំងនេះទៅ  ឆ្លើយប្រាប់មកវិញមិនច្បាស់លាស់សោះ  ថាអង្គរនេះគឺស្តេចទេវតាបានសាង  ដោយមានយក្សជួយផង  ហើយថាពួកស្តេចទេពអប្សរ  បានយោងដុំថ្មឆ្ងាយក្រៀមដែលជាងមានថ្វីដៃធ្វើឡើងទៅលើ  ហើយព្រមទាំងបង្ហាញដល់អ្នកដំណើរនេះ  សំណាមម្រាមដៃដែលជាប់នៅថ្មថាជាម្រាមដៃទេវតា  រួចពីនោះក៏បាននិយាយពីស្តេច ១ អង្គដែលកើតឃ្លង់ ដែលមានរូប ១ នៅតែម្នាក់ឯងលើដីកល  មានស្មៅលូតលុបក្នុងស្ងាត ៗ

លោកហង់រីមូហុតមរណភាពទៅ នៅវេលាក្រោយ ដែលបានរកឃើញអង្គរបន្តិច ឯសេចក្តីកត់សម្គាល់ទិនតំនូវដែលលោកបានគូរ បោះពុម្ពក្នុងកាសែត "ដុំវិញទ្វីប" នេះក៏ញុំាងសាធារណជនឲ្យដឹងគ្រប់គ្នាការដែលលោករកឃើញទាំងប៉ុន្មានអំពីប្រាសាទខ្មែរនោះ មិនត្រូវឲ្យសាប-សូន្យទៅវិញឡើយ ។

ឆ្នាំដែលគេឃើញប្រាសាទបុរាណទាំងនេះ ត្រូវនឹងឆ្នាំដែលក្រុងបារាំងសែសមកយកស្រុកកូសាំងស៊ីន នឹងឆ្នាំដែលមានសេចក្តីប្រស្រ័យទៅវិញទៅមក របស់រាជការបារាំងសែសនិងរាជការសៀម ដែលជាទីនាំឲ្យបង្កើតរាជការទំនុកបម្រុងក្រុងកម្ពុជា ។

ក្នុងឆ្នាំ ១៨៦៤ មន្ត្រីសៀមម្នាក់ដែលតំណាងរាជការស្រុកសៀមមកក្រុងភ្នំពេញនោះ គេបានហៅឲ្យចូលទៅវិញ ដូចនេះឃើញថាអំណាចផែនដីសៀមដែលផ្សាយលើក្រុងកម្ពុជា ជាច្រើនរយឆ្នាំនោះ ផុតត្រឹមឆ្នាំនោះហើយ ។

ភ្នាក់ងារបារាំងសែសដែលទទួលបង្គាប់ មកតាំងអាណាព្យាបាលថ្មីនោះ គឺមកប៉ាល់ម្នាក់ឈ្មោះអែរណេសមារក៏ឌូដារត៍ដឺឡាគ្រេ លោកកំម៉ង់ដង់ដឺឡាគ្រេនេះ ជាទាហានមានតម្លៃ ហើយប៉ុនប្រសប់ បានធ្វើការដ៏ប្រសើរនេះឲ្យសម្រេចបាន មិនជាយូរប៉ុន្មានលោកបានចាត់របៀបក្នុងស្រុកខ្មែរ ឲ្យបានសេចក្តីសុខសេចក្តីចម្រើន ដែលតាំងពីដើមរៀងមក

ទល់ត្រឹមនោះ មិនដែលឃើញមានសោះក្នុងក្រុងកម្ពុជា ដែលជានគរតែងតែនៅក្នុងអំណាចមនគរឯទៀត ។

ទៅវេលាដែលមកតាំងនៅក្រុងភ្នំពេញ លោកកុម៉ង់ដង់ឌូដារ៉ត់ដឺឡាគ្រេពិចារណារិះរករៀបចំ សេចក្ដីស៊ីវិល័យរបស់ជាតិខ្មែរ និងរុករករកប្រាសាទបុរាណ ដែលលោកមូហុតបានរកឃើញក្នុងតំបន់ទន្លេសាបនៅវេលាដែលបើកកប៉ាល់ល្បាតក្នុងសមុទ្រមេឌីទែរណេ នោះលោកល័យតណ្ហដំទង់នេះបានទៀតទៅ.មើលប្រាសាទអាក្រុប៉ូល នៅស្រុកក្រិកផង ហើយនៅវេលាដែលបានមកឃើញប្រាសាទអង្គរនោះ ក៏ហាក់ដូចជាប្រាសាទរបស់ស្រុកក្រិកកើតឡើងនៅមុខជាថ្មីទៀត ។

បានពិនិត្យមើលប្រាសាទទាំងនេះជាច្រើនដង ហើយអធិប្បាយអំពីក្បាច់ចម្លាក់ អំពីគំនូរ អំពីផែនទី និងភាពសណ្ឋានវិក្រុង ។ លោកឌូដារ៉ត់ដឺឡាគ្រេ បានជួបនឹងអ្នកដំណើរជាតិអាំងគ្លេសម្នាក់ឈ្មោះ ស-ថុំសុន ដែលទើបតែនឹងថតយករូបអង្គរវត្តហើយៗ ក៏បានស្គាល់គ្នានៅទីនោះ ឯរូបថតជាប់នឹងកញ្ចក់ដែលលោក ស-ថុំសុន ថតបាននោះ ញុំាងឲ្យលោកឌូដារ៉ត់ដឺឡាគ្រេ គិតឃើញដល់សេចក្ដីត្រូវការលើវត្ថុនោះ ដែលក្នុងកាលនោះមិនទាន់មានជាញឹកញយនៅឡើយ ហើយលុះដំណើរជាន់ក្រោយបាននាំអ្នកថតរូបទៅជាមួយផង ។

ក្នុងពេលជាមួយនោះ បានចាត់ការរើកឡូទៅទាំងអស់ បានប្រែពង្សាវតារស្រុកខ្មែរជាភាសាបារាំងសែស រឿងរ៉ាវដែលចារឹកជាអក្សរ

ទាំងប៉ុន្មាន ដែលអាចនឹងនាំឲ្យបានយល់ដល់នគរខ្មែរពីដើមនោះ បាន ប្រមូលផ្តុំគ្នាហើយពិនិត្យត្រួតត្រាដោយម៉ត់ចត់ បានយកលោកសង្ឃដែលស្ទាត់ខាងអក្ខរវិធី មកជួយពិគ្រោះ ឯរឿងរ៉ាវទាំងប៉ុន្មាននោះ ក៏កាន់តែចូលជាពង្សាវតារបន្តិចម្តង ៗ ហើយប្រាសាទអង្គរក៏អស់ទៅជាសេចក្តីអស្ចារ្យទៅវិញតាំងពីនោះមក ឯឈ្មោះស្តេច ដែលគ្រងរាជ្យក្នុងក្រុងនេះបានស្គាល់ឡើងវិញ ។

ក្នុងឆ្នាំ ១៨៦៦ លោកកុំម៉ង់ដង់ដឺឡាគ្រេ បានទៅកាន់អង្គរទៀត ជាមួយនឹងក្រុមជំនុំវិជ្ជាលោក១ក្រុម ដែលទើបនឹងតាំងបង្កើត ដើម្បីពិនិត្យទន្លេមេគុង ហើយដែលលោកកុំម៉ង់ដង់ដឺឡាគ្រេនេះជាអធិបតី ដំណើរទៅមើលនេះគឺជាដំណើរជាន់ក្រោយ បំផុតរបស់លោក ក្នុងថ្ងៃ ១ នោះជាថ្ងៃក្តៅ ពួកក្រុមជំនុំទាំងនេះជិះលើខ្នងដំរីដើរលេងជុំវិញអង្គរវត្ត ថ្ងៃក្រោយតទៅទៀតទៅលេងឯប្រាសាទបាយ័ន វិមានអាកាសនិងប្រាសាទខ្លះឯទៀតផ្សេង ៗ នៅថ្ងៃ ១ ស្ទូយតក្រុំជំនុំទាំងនេះបានវិលត្រឡប់ពីប្រាសាទបុរាណ មកប្រជុំជួបគ្នាវិញនៅកប៉ាល់សាលុបលេខ ២៧ ចតនៅមាត់ស្ទឹងសៀមរាប នៅវេលាក្រោយដែលបានឈប់នៅផ្ទះចៅហ្វាយស្រុកជាតិស្រុកអាយបន្តិច ។

ក្នុងពួកលោកឌូដារត៍ដឺឡាគ្រេទាំងប៉ុន្មាននោះ មានអ្នកហ៊ីស្សេរកប៉ាល់ជំទង ២ នាក់ ដែលអង្គរល្បីឡើងដោយមនុស្សទាំងពីរនាក់នេះ គឺលោកហ្វ្រង់ស៊ីគានេញ និង លោកល្វីដឺឡាពរត៍ ។

ផងទាំងអស់គ្នាក៏បានស្គាល់ការ ដែលលោកហ្វ្រង់ស៊ីគារនីញេបានធ្វើ អំពីដែលបានពិនិត្យទន្លេមេគង្គផ្នែកខាងលើ អំពីត្រឡប់មកក្នុងប្រទេសឥណ្ឌូស៊ីន កាលក្រោយច្បាំងពីឆ្នាំ ១៨៧០-៧១ អំពីតយុទ្ធនឹងពួកចោរចិន (ហ៉ៃយុងណា ឬពួកទង់ជ័យខ្មៅ) ដែលនាំឲ្យលោកមរណភាពក្នុងស្រុកហាណូយ ហើយបណ្តាលឲ្យបានវាយយកស្រុកតុងកឹង ប៉ុន្តែប្រហែលជាមានមនុស្សជាច្រើនមិនដឹងគំនិតរបស់លោកនេះ ដែលលោកបានផ្តែផ្តាំចិត្តក្នុងជាតិនេះថា នឹងត្រឡប់ទៅមើលអង្គរជាថ្មីទៀតឡើយ ហើយនឹងបានធ្វើជាអ្នករក្សាទូរប្រាសាទបុរាណ ដរាបលុះដល់កំណត់ឈប់លែងធ្វើរាជការ ក្នុងសេចក្តីកត់ត្រារបស់លោកហ្វ្រង់ស៊ីគារនីញេនោះមានច្រើនភាគដែលនិយាយអំពីក្បាច់អលង្ការខ្មែរ ដែលជាសេចក្តីពិរោះ សេចក្តីសរសើរពីស្នាដៃរបស់ជាងដែលធ្វើនោះ មានជាច្រើនទំព័រ លោកបាននិយាយសរសើរថាដូចនេះ “ សប្បាយអ្វីម្ល៉េះ ដែលបានឃើញខាងនេះថ្ម ខាងនោះរូប ហើយបន្តិចទៅទៀតប្រាសាទ” លោកពិចារ-ណារកបែបសាងប្រាសាទដែលបាក់បែកទៅ ដើម្បីដាក់ក្នុងផែនទីបញ្ចូលទៅជាមួយនឹងប្រាសាទបុរាណ ដែលរកឃើញហើយ ហើយលោកនិយាយតទៅទៀតថា “ យូរទៅទៀតគង់តែនឹងឃើញមានក្នុងស្រុកខ្មែរប្រាសាទផ្សេង ៗ ជាច្រើនដែលមិនទាន់បានស្គាល់ក្នុងព្រៃធំ ៗ ដែលសុទ្ធតែជាកន្លែងមនុស្សនៅកាលពីដើមទាំងអស់ ” ។

ការដែលលោកហ្វ្រង់ស៊ីគារនីញេបានបំណងទុកនោះ មិនបានសម្រេច តែដល់ក្រោយមកលោកហ្វីដឡាពត៍ជាមិត្រធ្វើឲ្យបានសម្រេចខ្លះដែរ ជាក្រោយដែលលោកកំម៉ង់ដង់ដឺឡាគ្រេ មរណភាពទៅក្នុងឆ្នាំ ១៨៦៧ នោះគេបានគិតថាត្រូវចាប់ធ្វើការ ដែលមន្ត្រីនេះបានផ្ដើមធ្វើតទៅទៀតឬអ្វី គ្មានអ្នកសង្ស័យថានឹងមានចាត់មនុស្សជំនួសមកធ្វើការនោះសោះឡើយ ដោយការនោះជាការធំណាស់ ប៉ុន្តែបើនឹងឲ្យមានជាការរិះរកក្បាច់អលង្ការដែលមានល្បីក្នុងស្រុកខ្មែរជាថ្មីវិញបាន ។

កាលក្នុងរដូវប្រាំង គឺរដូវក្ដៅក្នុងឆ្នាំ ១៨៧១ លោកអាមីរ៉ាល់-ឌ៉ូពុរេ ជាសេនាបតីក្រសួងជើងទឹកជាមួយនឹងលោក ស៊ុលស៊ុម៉ុង បានចាត់មីស្យុង១ក្រុមមកពិនិត្យប្រាសាទបុរាណខ្មែរនៅលើដែនស្រុកខ្មែរនិងដែនស្រុកសៀម បានចាត់លោកដឺឡាពត៍ឲ្យត្រួតត្រាពួកមីស្យុងទាំងនោះ ២ ឆ្នាំតពីនោះកប៉ាល់ ១ ឈ្មោះ ឡាសវីលីង បានចេញពីព្រែស-ត មកជាមួយនឹងកប៉ាល់សាលុប ១ ក្នុងកប៉ាល់នោះមានពួកមីស្យុងនេះជិះ តម្រង់ទៅឯទន្លេសាប ពួកមីស្យុងទាំងនេះមានសុទ្ធតែពួកអ្នកប្រាជ្ញនិងពួកវិទូនាដែលសម្រាំងរើសយក ហើយមានពួកទាហានជើងទឹកជួយអមថែមទៀត ។

រឿងរ៉ាវអំពីដំណើរនេះ លោកដឺឡាពត៍ បានអធិប្បាយក្នុងសៀវភៅ១ ដែលបានគូរជារូបគំនូរដោយដៃឯង ឯចំណែកខាងអលង្ការផ្សេងៗ

ដែលយកពីស្រុកខ្មែរទៅនោះ បានយកទៅតាំងប្រឡងនឹងរបស់ឯទៀត ដែលមានក្នុងលោកទាំងមូល កាលពីឆ្នាំ ១៨៧៨ ហើយដែលបានទីដ៏ឧត្តម នៅកណ្ដាលក្បាច់អលង្ការណ៍ អេស៊ីប និងអលង្ការណ៍ចិន គ្រឿងអលង្ការណ៍នោះហើយ ដែលបានជាគ្រាប់ពូជនៃសារមន្ទីរខ្មែរនៅស្រុកត្រូកាដេរ៉ូ សព្វថ្ងៃនេះ វេលាដែលមោនសៀរដឺឡាពរត៍ ត្រឡប់មកវិញ នោះអង្គរក៏តាំងមានជ័យដ៏ប្រសើរឡើង អស់ទាំងពួកដែលធ្វើតំណាងប្រាសាទនោះក៏បានដំណើរធ្វើឲ្យភ្ញាក់ផ្អើលដល់អ្នកស្រុកបារីសជាច្រើន អំពីបែបក្បាច់អលង្ការណ៍ខ្មែរ ដែលគេពិនិត្យតាមក្រោយលំអានគោលដើម នៃការដែលគេឆ្ងល់ងល់គ្នាអំពីជាងឆ្លាក់ដែលមើលមិនយល់ ហើយដែលគេទើបតែនឹងបានដំណឹងថាមាន(១) ឯគំនូររបស់លោក ដឺឡាពរត៍ បានធ្វើផ្សាយឮទៅអំពីដំណើរដែលលោកបានជិះកប៉ាល់ឡូសីវិលីនមក គ្មានអ្នកឯណា១ ចេះអធិប្បាយដូចលោក អំពីកងកៅទ្រង់ព្រាយយ៉ាងល្អ ឯគំនូរដែលលោកគូរនោះ មានឃើញព្រៃស្បាត មានដើមត្នោតនិងវល្លិដើមពោធិធំៗ នាំឲ្យនឹកឃើញដល់ថ្មីដៃរបស់ជាងលេខ ១ នៅស្រុកអ៊ីតាលីឈ្មោះពីក៏ណេស ។

លោកហ្វារ៉ូ ជាពួកមីស្យុង ដឺឡាពរត៍ បានរកឃើញអង្គរទី២ទៀត

(១) ភស្តុតាងដើមទុកនៅសារមន្ទីររបស់ខ្មែរនៅត្រូកាដេរ៉ូ នោះក្រុមជាងដែលតាំងរបស់នៅស្រុកម៉ារសីបានចេញប្រាក់សាងជាប្រាសាទ ១ តាមផែនទីអង្គរវត្ត គេបានដឹងអំពីថ្មីដៃក្រុមសាងទាំងនេះ ចម្លាក់អលង្ការណ៍ខ្មែរដ៏ប្រសើរ មួយទៀតនោះបានមកពីលោក អេម៉ូនីញេ ដែលតាំងនៅសារមន្ទីរ គីមេ ។

នៅខាងជើងទន្លេសាប ចម្ងាយ ១៧៦០ ម៉ែត្រពីទីនេះនៅបៀតភ្នំដងរែក ៗ

ប្រាសាទបុរាណខ្មែរដែលគេស្គាល់ឈ្មោះថា “បន្ទាយឆ្មារ” នោះ មានកំផែងពីរថ្មក្រហមនិងថ្មប្រផេះ កំពូលបាក់បែកដាច់ខ្ទេចខ្ទីនៅកណ្ដាលព្រៃស្ងាត់ដែលកើតព្រៃបំផ្លាញ ជាញឹកញយ ប្រាសាទនេះដូចជាអង្គរធំដែរ មានរូបទេវតានិងនាគធំៗ តាំងជួរ រូបមនុស្សមានមុខញញឹម ឯសសរទាំងឡាយនោះតជាប់គ្នាពី ១ ទៅ ១ ហើយ ឯជញ្ជាំងមានឆ្លាក់ជារឿងរ៉ាវបុរាណប៉ុន្តែឯអង្គរ នៅវេលា ដែលគេបានរកឃើញក្នុងឆ្នាំ ១៦០០ នោះ គេបានស្គាល់ថា ជាកន្លែងដែលគេបានតម្កល់សាសនានៅវេលាក្រោយមកទៀត ឯបន្ទាយឆ្មារនោះគេភ្លេចចោលនៅក្នុងព្រៃ លុះដល់បារាំងសែសមក ទើបបានរកឃើញឡើងវិញ ហើយសព្វថ្ងៃនេះ ក៏នៅតែស្ងប់ស្ងាត់ទៀតឮតែសម្លេងសត្វក្ងោកនិងស្វានិងស័ព្ទស្លឹកឈើជ្រុះ ៗ

ឯពង្សាវតារស្ដេចស្រុកខ្មែរដែលលោកដឺឡាគ្រេ បានប្រែនោះមានតែរឿងរ៉ាវស្ដេចក្នុង ៦០០ ឆ្នាំមុននេះ ក្នុងមហាសករាជដែលត្រូវនឹងឆ្នាំសាងប្រាសាទអង្គរនិងប្រាសាទផ្សេងៗនោះ ពង្សាវតារនេះគ្មាននិយាយបន្តិចសោះមានតែប្រាសាទបុរាណដែលមានចារឹកអក្សរ ដែលសាងដោយកន្លែងផ្សេង ៗ ក្នុងគនរខ្មែរ ទើបមានអធិប្បាយអំពីពង្សាវតារស្រុកខ្មែរច្បាស់លាស់ល្អ ឯប្រាសាទទាំងឡាយនេះ ជួនកាលជាផែនថ្មលើកឡើងនៅជាប់ពីគេមានចារឹកអក្សរ ជួនកាលជាអក្សរឆ្លាក់នៅលើខ្លោងទ្វារ ឬជញ្ជាំងធ្វើឲ្យអ្នក ដែលពិនិត្យរិះពិចារណាដោយមាំមួន ចារឹកខ្មែរទាំង

ឡាយនោះ បានបញ្ចូលក្នុងពួកចារឹកទាំងប៉ុន្មាន ដែលមានប្រទេសអាស៊ី អក្សរទាំងឡាយបានធ្លាក់ត្រឹមត្រូវឥតល្អៀង ដែលគេមិនធ្លាប់ប្រទះឃើញចារឹកឥណ្ឌាក្នុងឆ្នាំជាមួយនោះ ចំពោះក្នុងនិងប្រជុំអក្សរទាំងនេះ គេមិនអាចនឹងមិនឆ្ងល់យល់ក្នុងអំពីឥទ្ធិឫទ្ធិ និងជ័យជម្នះរបស់ស្តេចនៅអង្គរពីដើមឡើយ មានចារឹកជាច្រើនក្នុងពួកនេះ ធ្លាក់ជាពាក្យសំស្រ្កឹត គេមើលចារឹកទាំងនោះទៅ មិនឃើញមានទាស់អ្វីសោះ ហើយឯចារឹកដែលធ្លាក់ជាភាសាខ្មែរ ក៏មានប្រការដូចគ្នា ដើម្បីនឹងមើលអក្សរទាំងនេះឲ្យច្បាស់សេចក្តី នោះគេរាប់ប្រជុំពួកអ្នកប្រាជ្ញធំៗ ដែលស្ទាត់ខាងវិជ្ជាស្រុកឥណ្ឌា គឺលោកបែរគែញ ១ លោកបារថ៍ ១ និងលោកអាចារ្យគែរន៍ នៅសាលាប្រជុំជាន់ខ្ពស់ នៅស្រុកឡឺដឺ ១ ។

អ្នកដែលពិនិត្យមើលអក្សរខ្មែរនោះ ត្រូវរាប់បញ្ចូលលោកលីយើគីណង់អេមូនីញេ ដែលជាអ្នកចាប់ធ្វើការដោយប៉ុនប្រសប់អំពីលោកកុំម៉ង់ដង់ឌុដារត់ដឺឡាគ្រេមក តាំងពីឆ្នាំ ១៨៧៥ មន្ត្រីនេះ បានបង្កើតជាដំបូងសៀវភៅសព្វវចនា បារាំង-ខ្មែរ អ្នកប្រាជ្ញនេះ ចេះតែខំសង្វាតធ្វើឲ្យយើងចេះដឹងជាច្រើន អំពីនគរខ្មែរកាលពីដើម លោកបានរកឃើញចារឹកជាច្រើននៅក្នុងព្រៃ ឯចារឹកទាំងនេះនាំឲ្យបានជាប្រដាប់ដំបូងដែលជាប្រយោជន៍ក្នុងការរិះរកពង្សាវតារស្រុកខ្មែរ ក្នុងពីរផ្តាច់ឆ្នាំក្នុងឆ្នាំ ១៨៨២ លោកអេទៀណេសីណង់ បានអធិប្បាយថាដោយអំណាចការងាររបស់លោកអេមូនីញេ ទើបការទាំងឡាយក្នុងស្រុកខ្មែរ ដែល

កន្លងមកនោះក្តីច្បាស់ឡើង ហើយឯចារឹកសំស្ក្រឹតក៏បានលេចឡើងទៀត អ្នកប្រាជ្ញនេះបានបន្ថែមសេចក្តីថាដូចនេះ មានតែព្រះទើបបានជ្រាបថា សម្បត្តិអ្វីខ្លះដែលភាសាសំស្ក្រឹត ១ ភាគនេះ កប់ទុកឲ្យយើង ។

ពង្សាវតារដែលលោកអេមូនីញេ បានរៀបរៀងអំពីស្រុកខ្មែរ នោះបានបោះពុម្ពសៀវភៅ ៣ ក្បាល សៀវភៅទាំងនេះធ្វើឲ្យអង្គររស់ឡើងជាថ្មី ដោយសេចក្តីអធិប្បាយផ្សេងៗ និងក្បាច់ចម្លាក់ដែលនៅលើផ្ទាំង ព្រមទាំងរឿងរ៉ាវ ទំនៀមទម្លាប់ស្រុក ឯពង្សាវតារនេះ មានលោកមូរ៉ា, លោកហ្វូរនីរ៉ូ, លោក ប៉ាវី, លោកម៉ាស្ប៉េរ៉ូ, លោកគ្រាលីយេ, បានបំពេញបញ្ចប់ជាក្រោយទៀត ម៉្យាងវិញទៀតលោកល្វី ហ្វីណូត៍ និងលោកសឺដេស បានខំរកតទៅតាមការ ដែលលោកបារថ៍ និងលោកបែរកែញ បានរិះរកអំពីអក្សរវិធី ហើយសព្វថ្ងៃនេះ យើងបានដឹងច្បាស់អំពីសេចក្តីស៊ីវិល័យនៃក្រុងកម្ពុជាកាលជាន់ដើម ហើយដែលយើងអាចនឹងបង្កើតជារឿង ជុំវិញប្រាសាទបុរាណបាន ឥឡូវនេះយើងបានស្គាល់សម្បត្តិស្តេច ដែលគ្រងរាជ្យក្នុងអង្គរស្ទើរតែទាំងអស់ ដោយអំណាចចារឹកទាំងឡាយ ដែលបានរកឃើញ ចារឹកទាំងនោះធ្វើឲ្យយើងដឹងថា នគរដែលមានឫទ្ធិនោះចាប់តាំងពីឆ្នាំ៩០០ ទៅដល់ឆ្នាំ ១២០០ ហើយឯព្រំប្រទល់នគរនោះ គឺជាច្រើនជាងព្រំប្រទល់សព្វថ្ងៃនេះ ក្សត្រិយ៍ទាំងប៉ុន្មានដែលគ្រងរាជ្យក្នុងអង្គរនោះបើមិនមែនជាជាតិខ្លួនសុទ្ធ ក៏សុទ្ធតែ

កាន់ទំនៀមទម្លាប់តាមក្លិនទាំងអស់(១) មានពួកព្រាហ្មណ៍ជាច្រើនសម្រាប់ទូន្មានស្ដេច ឯភាសាដែលកប់កានជាងគេក្នុងព្រះបរមរាជវាំងនោះ គឺភាសាសំស្ក្រឹត ឯរបៀបពិធីបុណ្យនិងរបៀបបង្ហើយបុណ្យនោះមានលំអានដូចស្រុកក្លិនទាំងអស់ តាំងពីរបៀបបន្ទាប់បន្សំឡើងទៅ គឺក្បួនហែគ្រឿងប្រដាប់តន្ត្រីគ្រឿងសាស្ត្រាវុធនិងគ្រឿងអលង្ការសម្រាប់ក្សត្រ ឯរបាំនោះលេងរឿងរាមាយណ៍ ក្សត្រនិងមន្ត្រីធំៗ ក្នុងព្រះបរមរាជវាំង នៅវេលាដែលដង្ហែចេញនោះ មានបាំងក្លស់និងត្រូវតន្ត្រីបាំហែតាមក្រោយ ជួនកាលសែងទីងរមាស ជួលកាលជិះលើខ្នងដំរីមានក្រាលកម្រាល ឯស្ដេចនិងមន្ត្រីទាំងនេះ មានកិរិយាដូចជាមនុស្សក្លាហាន ដែលមានក្នុងរឿងមហាភារត គឺចូលចិត្តនិងល្បែងនឹងសេះនឹងចម្បាំងជាតិខ្មែរ មានបែបដូចជាជាតិឥណ្ឌូដែរ គឺបែកចេញជា ៤ ពួក ពិតមែនតែសំអាងក្នុងចារឹកទាំងឡាយមិនពិតប្រាកដ តែដែលជាប្រាកដនោះ គឺឃើញមានពួកបុរោហិត ពួកព្រាហ្មណ៍អភិសេកស្ដេចតាមទំនៀមទម្លាប់ឥណ្ឌូ អំពីស្រោចទឹកពួករាជគ្រូឬអាចារ្យដែលបង្ហាត់បង្រៀនស្ដេចនោះ បានបង្រៀនវិជ្ជាផ្សេងៗ គឺវិធីគិតគូរលេខនិងក្បួនហោក ក្បួនវេយ្យាករណ៍សំស្ក្រឹតនិង

(១) ដើមកំណើតជាតិខ្មែរនោះមិនទាន់ស្គាល់នៅឡើយ អាចារ្យកែរន៍ស្មានថាប្រហែលជាពួកដែលបែកមកពីស្រុកខាងលិច ប៉ុន្តែមិនឃើញមានពង្សាវតារអ្វីធ្វើឲ្យឃើញជាក់ប្រាកដសោះ ដរាបដល់មកសព្វថ្ងៃនេះ មើលសៀវភៅវេយ្យាករណ៍ដែលលោក ស៊ិរ-ម៉ាស្ប៉េរ៉ូ តែងពីឆ្នាំ ១៩១៥ ក្នុងភាគទី ១ ។

លក្ខណបញ្ញត្តិផ្សេងៗ ពួកព្រាហ្មណ៍ និងគ្រូទាំងនេះ ចាត់ការកសាងទេវស្ថានផ្សេងៗ និងរៀបចំត្រួតត្រារហោពលទាំងឡាយ ម្យ៉ាងវិញទៀត បានបង្រៀនទូវធម៌ស្ងាត់កំបាំងដល់ស្តេច ដែលលោកអេមូនិញេឃើញ ថាជាការធ្វើពលីការបូជាផ្សេងៗ ។

ចារឹក ១ ដែលរកឃើញនៅប្របអង្គរវត្ត ហើយដែលលោកបែរគេញ បានប្រែនោះ ពង្សាវតារពួជព្រាហ្មណ៍ដែលមកនៅស្រុកខ្មែរ ដោយសេចក្តីមេត្តាករុណា ហើយដែលជីតាជីដូនកើតនៅស្រុកឥណ្ឌូ វេលាដែលមើលចារឹកនោះទៅ ហាក់ដូចជាខ្លួនឃើញទៅនៅក្នុងលោក ១ ផ្សេង ដែលគេសិក្សាតែមន្តអាគម ហើយដែលអ្នករៀនសូត្រកាន់នៅផ្លូវបង្អៀត គឺធ្វើទុក្ករកិរិយា ទំសិក្សានូវក្បួនវេទផ្សេងៗ សេចក្តីនោះធ្វើឲ្យឃើញថាជាន់នោះ ព្រះឥសូរឬសិវរុងរឿងភ្លឺប្រដូចព្រះអាទិត្យទាំង ១០០ ។

នៅប្របសាសនាឥណ្ឌូ មានពុទ្ធសាសនាដែលកាន់តាមលទ្ធិមហាយាន ផ្សាយជាច្រើនទូទៅក្នុងស្រុកខ្មែរចាស់ មានបដិមាករជាច្រើន និងចារឹកផ្សេងៗ បញ្ជាក់ឲ្យឃើញថាសាសនានេះ មានប្រើចូលបែបសាសនាដែលនៅជិតគ្នា ដែលលោកបាមឺដារមេស្ត្រែ និយាយថាមានចារឹកសំស្ក្រឹតខ្លះ រំលឹកដល់ព្រះឥសូរក្នុងបទដើម ហើយដល់ព្រះពុទ្ធក្នុងបទបន្ទាប់ អ្នកប្រាជ្ញនៅខាងបូព៌ាប្រទេសបានពិនិត្យឃើញថា បែបនេះ មានច្រើននៅក្នុងស្រុកឥណ្ឌូដែរ កាលក្នុងសករាជជាមួយគ្នា

គេឃើញក្សត្រិយ៍ខ្លះផ្សាយសេចក្ដីអនុគ្រោះ ទៅលើអ្នកកាន់សាសនាព្រះឥស្វរនារាយណ៍ ព្រះពុទ្ធឥតមានព្រះហឫទ័យទៅពួកណាជាងពួកណាឡើយ ។

ចារឹកនៅអង្គរវត្តដែលពោលខាងលើនេះ បានធ្វើក្នុងឆ្នាំ ៨០០ គឺជាចារឹក ដែលធ្វើក្រោយបំផុតក្នុងមហាសករាជដែលមានមកដល់យើង ។

តពីឆ្នាំ ១៣០០ មក ពង្សាវតារស្រូបបាត់ទៅជាច្រើនឆ្នាំ ដែលបាត់នេះគឺដោយគ្មានប្រាសាទដែលមានចារឹកអក្សរ ចុះហេតុអ្វីបានជាបាត់សូន្យ ត្រង់នេះយើងក៏មិនបានប្រាកដ អំពីហេតុដែលនាំឲ្យបោះបង់អង្គរដោយជាការគ្មានគេចាំសោះ ប៉ុន្តែប្រហែលតែមកពីកើតចម្បាំង នឹងស្រុកសៀមជាញឹកញយហើយគេលុកលុយបានជាច្រើនគ្រា ទើបស្រុកខ្មែរបោះបង់ទីក្រុងនេះចោល លុះដល់មកឆ្នាំ ១.៦០០ ទើបមានសិលាចារឹកនៅអង្គរជាថ្មីទៀត ក្នុងចារឹកទាំងនេះគ្មានចារឹកណាមួយធ្វើចំពោះទៅសាសនាឥណ្ឌសោះ ចារឹកទាំងអស់មានកិរិយាចំពោះតែទៅពុទ្ធសាសនា ចារឹកទាំងអស់នេះឆ្លាក់នៅលើសសរអង្គរវត្ត សម្ដែងនូវជ័យជម្នះរបស់ពុទ្ធសាសនា ក្នុងប្រាសាទសម្រាប់សាសនាព្រាហ្មណ៍ដែលមានពុទ្ធរូបទឹបមាសជាជំនួសបដិមាករព្រះនារាយណ៍ ចារឹកទាំងនេះមានសេចក្ដីដើមជាភាសាបាលីជាច្រើន គឺជាជ័យជម្នះពុទ្ធសាសនា ក្នុងកោះលង្កាលើសាសនាចាស់ក្នុងស្រុកខ្មែរ ។

នៅវេលាដែលបានរៀនវិជ្ជាក្នុងស្រុកឥណ្ឌាទៅ គេបានដឹងអំពីរឿងរ៉ាវចិន ដែលមានប្រយោជន៍យ៉ាងធំក្នុងវិជ្ជាទាំងនេះ គឺសុទ្ធតែជាពួកអ្នកដំណើរជាតិចិនទាំងអស់ដែលធ្វើឲ្យយើងដឹងអំពីស្រុកឥណ្ឌា កាលដើមគ្រិស្តសករាជ ហើយអ្នកដែលរិះរកវិជ្ជាឥណ្ឌានោះ ត្រូវការដល់ចារឹកហ្វាហៀនទិងហៀនត្សង់ជាញឹកញយ ចំណែកខាងពង្សាវតារស្រុកខ្មែរនេះទៀត ក៏ស្រុកចិនធ្វើឲ្យយើងបានដឹងដែរ គឺមានសេចក្តីពណ៌នាជួន បរិបូណ៌អំពីស្រុកខ្មែរក្នុងកាលដែលចំរើនរុងរឿង ។

ក្នុងឆ្នាំ ១៨១៩ លោកអាបិលរេមុយសាត បានប្រែពីភាសាចិនមកជាភាសាបារាំងសែស សៀវភៅ១ ដែលជាវតាគួន ជាកដទូតស្តេចកុប៊ីឡាយខ័នបានតែង អ្នកដំណើរនោះស្តេចចិនបានចាត់មកឯនគរចេនឡាក្នុងវេលាផុតឆ្នាំ ១៣០០ ឯសេចក្តីដែលតែងនេះ លោកប៉ូលប៉ិលីយ៉ូបានប្រែជាថ្មីទៀត(១) ហើយឃើញមានជាច្រើនទំព័រដែលសាស័ព្ទអំពីអង្គរ ។

កាលក្នុងជាន់លោកអាបិលរេមុយសាតនោះ គ្មាននរណា១ ជឿថាប្រាសាទដែលជាវតាគួនបានឃើញនោះ គង់ទ្រង់នៅដរាបដល់សព្វថ្ងៃនេះឡើយ លុះតែសំបុត្រនឹងសេចក្តីកត់សម្គាល់របស់លោកហង់រីមូហុតបានផ្សាយក្នុងលោកឡើង អំពីដែលបានឃើញប្រាសាទបុរាណទាំងនេះ ទើបចារឹករបស់ជាវតាគួននេះមានគេត្រូវការឡើងដែរ គួរឲ្យពេសព្វសាធុការឲ្យបានសេចក្តីដែលលោកប៉ូលប៉ិសីយ៉ូប្រែនោះ បោះពុម្ពឡើងជា

(១) មានក្នុងប៊ុល្លីតាំងសាលាបារាំងសែសនៅចុងស្រុកបូព៌ាប្រទេស ខ្សែ ២ ។

សៀវភៅហើយសៀវភៅនេះនឹងមានអ្នកដែលមើលនោះជាច្រើន ។

ជាតាគួននេះជាអ្នកណែផ្លូវ ១ ដ៏មានតម្លៃ គាត់បានយកចិត្តទុកដាក់ឲ្យចេះដឹងការទាំងអស់ តាំងពីការតូចតាចបន្ទាប់បន្សំដែលអ្នកដំណើរជាតិជាមួយនឹងគាត់តែងពណ៌នា គ្មានរបស់អ្វីរួចពីភ្នែកគាត់ឡើយ សេចក្ដីដែលគាត់តែងតាំង ៤០ ចំពូកនោះ មានទិយាយអំពីបែបកន្ទ្រង់ក្រាយស្រុក អំពីរដ្ឋវក្នុងស្រុក ទំនៀមទម្លាប់របស់អ្នកស្រុក របរក្យេត្រាធិការ និងផលដែលកើតក្នុងស្រុក គាត់បានពិនិត្យឃើញថា ស្រុកនោះនៅស្រួលណាស់ ព្រោះស្រួលរកស្រូវអង្ករ ស្រួលរកករិយា ស្រួលធ្វើរបរពាណិជ្ជការ អំពីផ្ទះសម្បែងនោះគាត់បានអធិប្បាយដោយផ្ចិតផ្ចង់ គឺផ្ទះរាជការសុទ្ធតែប្រក់សំណរសង្កសី ឯផ្ទះឯទៀតប្រក់ក្បឿងដីដុត ហើយឯផ្ទះបណ្ដារាស្ត្រវិញនោះសុទ្ធតែប្រក់ស្បូវទាំងអស់ ក្នុងកន្លែងសម្រាប់ធ្វើសន្និបាតនោះបង្អួចធ្វើពីមាសទាំងអស់ នៅជញ្ជាំងមានឆ្លាក់ជារូបដំរីហើយគេឃើញមានកញ្ចក់រៀបរៀងជាជួរ អ្នកដំណើរនេះសាសព្វតទៅទៀតថា នៅក្នុងវាំងមានប្រាសាទកំពូលខ្ពស់ ១ នៅខាងលើប្រាសាទ កំពូលខ្ពស់នោះ មហាក្សត្រិយ៍តែងផ្ទំនៅ អ្នកស្រុកទាំងអស់និយាយថា ក្នុងប្រាសាទនោះមានព្រលឹងពស់ ១ មានក្បាល ៩ ជាម្ចាស់ផែនដី ថាព្រលឹងនោះនិម្មិតជារូបស្ត្រី ១ រាល់យប់ ហើយស្ដេចតែងតែទៅផ្ទំជាមួយជាដំបូង បើទោះជាអគ្គមហេសីស្ដេចទី ១ ក៏មិនហ៊ានចូលទៅក្នុងទីនោះដែរ លុះយាមទី ២ ទើបស្ដេចចេញពីក្នុងបន្ទប់នោះទៅ

ផ្ទុំនឹងអគ្គមហេសី ឬស្រីជាបរិវារឯទៀតបាន បើយប់ណា ១ មិនឃើញព្រលឹងពស់នេះមក នោះកំណត់ព្រះជន្មស្តេចអយ់ត្រឹមនោះឯង បើស្តេចខានមិនបានទៅផ្ទុំនឹងពស់នោះ ១ យប់នោះនឹងមានកើតចលាចលអ្វីមិនខាន រឿងដែលអ្នកដំណើរចិនអធិប្បាយនេះ មិនទាន់លេចពីខួរក្បាលជាតិខ្មែរនៅឡើយ ហើយសព្វថ្ងៃនេះ នៅក្នុងភូមិខ្លះ ក្នុងនគរខ្មែរនៅមានរៀបពិធីថ្វាយដល់ព្រលឹងនាងនាគ ដែលជាមាតារបស់នគរនោះៗ

ឯចំពូកក្រោយបង្អស់ ក្នុងសៀវភៅដែលជាវតាគួនតែងនោះមានសារបានថា អំពីស្តេចយាងចេញ ជាវតាគួនបាននៅក្នុងតំបន់អង្គរជាង ១ ឆ្នាំ ហើយបានឃើញស្តេចយាងចេញបួនប្រាំដង គាត់បានអធិប្បាយជួនបរិបូណ៌ អំពីរបៀបក្បួនដែហែលជាដូចនេះ មានសេនាសេះនៅពីខាងមុខក្បួន ហើយខាងក្រោយបន្ទាប់មានទង់ជ័យតូច-ធំ និងតូរ្យតន្ត្រី ស្រីក្នុងវាំងបានចំនួន ៣០០ ទៅ ៥០០ នាក់ ប្រដាប់ដោយសម្លត់មានគំនូជាដើមឈើមែកឈើ មានផ្កាសៀតត្រចៀកកាន់បន្ទះគ្រប់ៗដៃ ដើរជាជួរគ្នាដោយពួកៗ ទោះជាកណ្តាលថ្ងៃក្តី បន្ទុះទាំងឡាយនោះអុជឡើងជានិច្ច រួចពីនោះទើបមានស្រីក្នុងវាំង ដែលកាន់គ្រឿងប្រដាប់ស្តេច ពីមាសនិងប្រាក់និងគ្រឿងអលង្ការផ្សេងៗ មានបែបទីទៃពីគ្នា ហើយដែលខ្ញុំមិនអាចនឹងដឹងថាគេប្រើប្រាស់ដូចម្តេច តពីនោះទៅទៀត មានស្រីក្នុងវាំងកាន់លំពែងនិងខែល ស្រីទាំងនោះសុទ្ធតែជាសេនាអមផ្ទាល់អង្គរបស់ស្តេច ទើបមានរទេះរថនាទៅដោយ

មាស ទឹមពពែនិងទឹមសេះបរតាមពីក្រោយ សេនាបតីនិងព្រះរាជវង្សានុវង្សទាំងឡាយ ជិះដំរីទាំងអស់ដើរទៅខាងមុខ ហោលក្អែកឆ្ពោះទៅកាន់ទីឆ្ងាយ ឯក្លោះទាំងឡាយដែលបើកបាំងសេនាបតីនិងព្រះរាជវង្សានុវង្សនោះ មានចំនួនមិនគណនាពុំបាន ក្រោយពួកទាំងនេះមានមហេសីនិងបរិវារស្តេច ជិះវ ជិះរទេះ ជិះដំរីរៀងគ្នាទៅ មានក្លស់ប្រហែលជាង ១០០ រចនាដោយមាសបើកបាំង នៅក្រោយស្ត្រីទាំងនេះ គឺស្តេចឈរលើដំរី ហើយព្រះហស្តទ្រង់ព្រះខ័នដ៏វិចិត្រ(១) អស់ទាំងភ្លុកដំរីសុទ្ធតែចងចង្កឹមាស មានក្លស់ចំនួនជាងម្ភៃមានពណ៌សរចនាដោយមាសបើកបាំងថ្វាយ ឯដងក្លស់ទាំងនេះសុទ្ធតែធ្វើពីមាសទាំងអស់ មានដំរីជាច្រើនប្រចៀតគ្នាជុំវិញស្តេច មានសេនាសេះ ១ ពួកការពារដំរីទាំងនេះ មិនឲ្យជិតស្តេច បើស្តេចទ្រង់យាងទៅកាន់កន្លែងដែលនៅជិតៗនោះ ទ្រង់គង់លើវ មានស្ត្រីក្នុងវាំង ៤ នាក់សែងទៅ ។

នៅវេលាដែលមើលសេចក្តីទាំងនេះ ហើយនរណា១ដែលមិនគិតដល់រឿងដែលមានជាប់នៅជញ្ជាំងអង្គរវត្តនោះ មានរឿង១ដែលឆ្លាក់នៅជញ្ជាំងប្រវែងប្រហែលជាង១០០ម៉ែត្រ រឿងនោះអ្នកដំណើរទាំងអស់បានស្គាល់ថាជារឿងលើកទ័ព(២) រូបនេះឆ្លាក់នៅក្រោមក្បាច់ស្លឹកឈើ ដែល

---

១- ព្រះខ័នដែលមាននៅក្នុងវាំងនៅក្រុងភ្នំពេញនោះប្រាកដជាព្រះខ័នរាជស្តេចខ្មែរកាលពីដើមហើយ ។ ២- ចម្លាក់នៅជញ្ជាំងអង្គរវត្តនោះ អ្នកដំណើរជាតិអាល្លឺម៉ង់ម្នាក់ឈ្មោះដុកទ័របាស្ទ្យង់ដែលបានមកមើលអង្គរបានតែង ហើយភិយសេចក្តីជាដំបូង នៅវេលាក្រោយដែលលោកមូហុតបានរកឃើញ ការនេះលោកសីដេសបានចាប់ធ្វើតទៅទៀត បា. ពិនិត្យទៅឃើញមានរឿងជាច្រើនដែលធ្វើតាមរឿងរាមាយណ ។

រចនាដោយផ្ចិតផ្ចង់ ជាតំណាងវាំងស្តេច ១ និងកងទ័ពកំពុងដើរ ១ កង មានរូបស្តេចឈរនៅលើដំរី ហើយឆ្ពោះព្រះភក្ត្រទៅកាន់ទីឆ្ងាយ ដូចជាកាលដែលជាវតាគួនគាត់បានពិនិត្យមែន មានសេនាសេះជិះលើខ្នងសេះ អស់ទាំងទាហានឈរជាជួរអណ្តាប់គ្នាដូចជារបង មានព្រាហ្មណ៍កាន់ភ្លើងជ័យ មានស្តេចស្រ្តីគង់លើអង្រឹងមានពួកមហោស្រពពាក់មកុដស្រួចហើយមានផ្កាព្រាវក្បួចក្បេងនិងខ្ចំកញ្ចុះ -ល។ ហើយមានបរិវារដង្ហែមិនបេះផុត មានពណ៌ប្រផេះដូចជាស្រមោល ហើយសម្លៀកបំពាក់នោះគេធ្វើតាមចិត្តទឹក ធ្វើជាពណ៌មាសនឹងជាពណ៌ក្រហមឆេះ វេលាដែលនិយាយដល់មកកងទ័ពនេះ យើងក៏គិតដល់ទៅកងទ័ពស្តេច ដែលទើបនឹងលើកនៅមុខ ម៉ារេសាល់ស្រុកបារាំង មានប្រគំតន្ត្រីស្គរនិងស្រឡៃខ្មែរ កណ្តាលទីស្នាក់នៅអង្គរ ។

ជាវតាគួនមិនមែនជាអ្នកអធិប្បាយអំពីស្រុកខ្មែរ តែម្នាក់ឯងទេ ក្នុងពង្សាវតារចិនពួកត្សិនពួកត្សៀខាងត្បូង និងពួកតាង ក៏មានជាច្រើនពួកដែលនិយាយអំពីស្រុកហ៊្វូណន ដែលជាស្រុកខ្មែរចាស់(១)នគរនេះកាលក្នុងដើមគ្រិស្តសករាជថ្កុំថ្កើងបរិបូណ៌ ឯផលដែលកើតក្នុងស្រុកនោះ គឺមាសគ្រឿងក្រអូបនិងត្បូង គេមានឆ្លាក់រូបពីឈើគឺខ្លឹមចន្ទន៍ ពួកអ្នកដំណើរចិនបានសាសព្វទៀតថា ក្នុងស្រុកនេះមានសត្វបតាក និង សត្វ

១- មើលសៀវភៅហ្វូណន ដែលមោនសៀប៉ីលីយូបានតែង នៅក្នុងប៉ុល្លីតាំងសាលាបារាំងសែស នៅចុងបូព៌ាប្រទេស ខ្សែ ៣ ឆ្នាំ ១៩០៣ ។

សេកជាច្រើន ។

ដោយជាប់ស្ពានមេត្រីនឹងស្តេចស្រុកចិនជាមាំមួន នោះស្តេចស្រុកហ្វូណនបានតាក់តែងទូតនាំសួយសារអាករទៅថ្វាយ ស្តេចស្រុកចិនជាញឹកញយ ឯសួយសារទាំងនោះសុទ្ធតែជាផលដែលមានក្នុងស្រុក ជួនកាលជាដំរី ឯសត្វនេះដោយព្រោះរូបរាងប្លែកពីគេ ក៏ស្រុកចិនគេថាសត្វឧត្បាតចង្រៃទើបក្នុងកាលនោះមានព្រះរាជប្រកាសស្តេចស្រុកចិន ហាមមិនឲ្យនាំដំរីចូលទៅ ព្រោះសត្វដែលរូបរាងប្លែកមកពីស្រុកឆ្ងាយនោះ អាចនឹងបង្កើតជាមេជម្ងឺក្នុងនគរបាន ។

(មានតទៅទៀត)



# កោសជ្ជ

គឺ សេចក្ដីខ្ជិលច្រអូស

## ពាក្យកាព្យរបស់ ថី ឆ. គីមហាត់ ធ្វើរាជការនៅមន្ទីរ

ប៉ុស្ដិ៍ខ្សែលួស ក្រុងភ្នំពេញ រៀបរៀង

---

## កោសជ្ជ

កោសជ្ជជាភាសាបាលី ប្រែតាមសព្ទខ្មែរនិម្មល
គឺខ្ជិលច្រអូសក្នុងកាយពល គ្មានគិតរវល់ពីការងារ ។
មុននឹងបរិយាយស្រាយរឿងនេះ ខ្ញុំសូមរិះក្នុងទ័យា
រំលឹកនឹកគុណព្រះពុទ្ធា ធម្មាសង្ឃាជូនពេកក្រៃ ។
រួចខ្ញុំសូមថ្លែងថែងអធិប្បាយ កែស្រាយកាយតាមដោយនិស្ស័យ
ប្រាជ្ញាខុនអាប់ក្រឧបមេយ្យ ដូចពេជ្រពុំថ្លៃអាប់រង្សី ។
សូមពួកបណ្ឌិតព្រឹទ្ធាចារ្យ ខមទោសាអស់សព្ទ
ដែលខ្ញុំពោលហើយពុំគប្បី សេចក្ដីខុសឆ្គងគង់ពាក្យពិត ។
សត្វលោកត្រូវដឹងប្រឹងបង្ការ កុំឲ្យបាបណាធ្លាមកជិត
ត្រូវខំសង្វាតឧហាតពិត ត្រូវប្រើគំនិតគិតការល្អ ។
ដូចជាគ្រួបសេចក្ដីខ្ជិល ក្រាលដោយមន្ទិលអធិករណ៍
ផនកបតេជៈតបៈបវរ គោងបេះយុទ្ធតកុំឲ្យបៀត ។

បើខំត្រែសែតបណ្តែតចិត្ត ខ្ជិលចូលមកជិតតែសិកសៀត
ទុក្ខារីផ្ទួនផ្ទួនមកទៀត នឹកស្ទើរខ្លាតឃ្លាតពីប្រាណ ៗ
ខ្ជិលនាំខូចខាតច្រើនពន្លឹក មហាសន្ធឹកគុណពុំបាន
ជនាទុជនកុំពប់អាន ទើបបានឆ្ងាយថ្កានពីអប្បលក្ខណ៍ ៗ
ខ្ជិលធ្វើការងារគ្មានធនធាន ខ្ជិលពុំគិតរៀនគ្មានយសសក្តិ
ខ្ជិលរះគារពខាតវិស្រាស: ខ្ជិលស្ម័គ្រព្រះពុទ្ធគ្មានចេស្តា ៗ
ខ្ជិលដកដង្ហើមប្រាសជីវិត ខ្ជិលគិតពុំបានថ្លាបញ្ញា
ខ្ជិលនិយាយពុំចេះវោហារ ខ្ជិលដើរយាត្រាខ្វិនពុំខាន ៗ
ខ្ជិលស្តាប់សព្ទសូរប្រែជាថ្ងន់ ខ្ជិលចង់គង់តែនឹងខានបាន
ខ្ជិលធ្វើបុណ្យទានគង់ក្រប្រាណ ខ្ជិលរកកំសាន្តខានសប្បាយ ៗ
ខ្ជិលសូត្ររៀនធម៌ធ្លាក់នរក ខ្ជិលលក់ទំនិញគ្មានលុយចាយ
ខ្ជិលដូតគង្គារគង់ក្រហាយ ខ្ជិលសំអាតកាយគ្មានក្លិនល្អ ៗ
ខ្ជិលថែរក្សាពុំឋិតថេរ ខ្ជិលសរសេរពុំចេះអក្សរ
ខ្ជិលពុំចង់មាននឹងបានក្រ ខ្ជិលល្អគង់តែបានអប្រិយ ៗ
ខ្ជិលមើលផ្លូវទៅគង់ពិលខ្វាក់ ខ្ជិលថ្នាក់ថ្នមថែកក្តីបេតី
ខ្ជិលពុំការនាគ្មានស្មារតី ខ្ជិលរកខន្តីគ្មានអំណត់ ៗ
ខ្ជិលរៀនក្រមច្បាប់ត្រូវផ្តួនា ខ្ជិលរកទ្រព្យាគង់កំសត់
ខ្ជិលរៀនខពួនពុំចេះកត់ ខ្ជិលប្រត់គង់ក្វាត់ជួលមិនខាន ៗ

ខ្ជិលរៀនវិន័យត្រូវអាបត្តិ
ខ្ជិលស្កាត់ធ្វើម្តេចនឹងជួបប្រាណ
ខ្ជិលបោសជម្រះពុំស្អាតបាន
ខ្ជិលប្រានធ្វើម្តេចរលំខ្លួន ។
ខ្ជិលចង់ធ្វើម្តេចនឹងបានជាប់
ខ្ជិលរាប់ធ្វើម្តេចដឹងចំនួន
ខ្ជិលប្រើមេត្តាឆ្ងាយក្តីសួន
ខ្ជិលពួនធ្វើម្តេចនឹងបានបាត់ ។
ខ្ជិលហៅធ្វើម្តេចនឹងស្គាល់នាម
ខ្ជិលស្ងៀមធ្វើម្តេចបានក្តីស្ងាត់
ខ្ជិលដេញធ្វើម្តេចនឹងព្រាត់ខ្លាត់
ខ្ជិលណាត់ធ្វើម្តេចត្រូវវេលា ។
ខ្ជិលលាងធ្វើម្តេចនឹងបានជ្រះ
ខ្ជិលធ្វើការហាសខាតកាលា
ខ្ជិលរក្សាសីលកើតវេរា
ខ្ជិលទារធ្វើម្តេចគេនឹងសង ។
ខ្ជិលឲ្យធ្វើម្តេចគេនឹងអរ
ខ្ជិលតទំនិញខាតទ្រព្យផង
ខ្ជិលចរចាល្អនាំសៅហ្មង
ខ្ជិលប៉ងម្តេចនឹងជួបប្រាថ្នា ។
ខ្ជិលទន្ទេញធ្វើម្តេចបានចាំ
ខ្ជិលដាំធ្វើម្តេចបានផ្លែផ្កា
ខ្ជិលខាត់ធ្វើម្តេចបានជ្រះថ្លា
ខ្ជិលស្អប់តណ្ហាទៅអបាយ ។
ជនអើយមើលចុះខ្ជិលទ្រមក់
នាំកើតកលយុគផងទាំងឡាយ
តែងមករួមរឹតជិតកិតកាយ
នាំឲ្យអន្តរាយច្រើនពេកក្តាត់ ។
ខានឃើញរបស់ស្រស់សោភា
អស់ទាំងទ្រព្យាសឹងរសាត់
វិនាសសាបសូន្យសណ្ឋានខ្លាត់
ដូចថ្មលិចបាត់ក្នុងគង្គា ។
ពុំដែលអណ្តែតត្រសែតឡើង
ពុំដែលបានថ្កើងមួយវេលា
រមែងស្ងួចតូចដូចចន្ទ្រា
រះកន្លងទៅនាកាលបក្ខ ។

ជនខ្ជិលក្តីក្រក៏មកដល់ ខ្វាយខ្វល់ចិត្តជ្រួលអួលអន់អាក់
ហាក់ដូចលំពែងត្រូវធ្លាក់ មកបាក់ត្រូវបំដើមឧក ៗ
ហើយដើរលួចប្លន់សន្សំធន ធ្វើបាបមហាជនច្រើនត្រៀបត្រា
ធ្វើបញ្ឆោតគ្នានរកា ខ្លះអត់អាហារស្លាប់ក្នុងព្រៃ ៗ
មានខ្លះធ្វើជាសូមយាចក សូមទានលួចឆក់ជនដទៃ
ពុំមានរអែងក្រែងគេទៃ ពុំមានកិតភ័យខ្លាចរាជការ ៗ
ខ្លួនកម្លាំងពេញកាយពល ពុំចេះទប់ទល់លៀងជីវា
បានថង់យាមមួយស្ពាយដាក់ស្មា ដើរសូមអាហារគេអាស្រ័យ ៗ
ធ្វើឬកយ៉ាងនេះពេញជាថោក ចាញ់ឬកក្អែកបក្សថ្លៃ
នាំខូចពូជពង្សវង្សាសៃយ ពេញជាចង្រៃក្នុងលោកា ៗ
ត្រកូលណាមួយមានកូនខ្ជិល វង្សនោះមន្ទិលពុំជ្រះថ្លា
ដូចជាព្រះចន្ទកង់ហត្ថ កហួយក្រមហាសម្បើម ៗ
ព្រៀងលាទជិតខាងគេនិន្ទា គេប្រជុំគ្នានិយាយដើម
ជាពូជនេះពេញជាពុំឆ្នើម ដូចទឹកសន្សើមធ្លាប់វិនាស ៗ
មនុស្សខ្ជិលតែងធ្វើឲ្យរដ្ឋា អាប់ឱនគាយាពុំឱកាស
ដូចក្អួលដែលជាប់គ្រឿងប្រាក់មាស នាំកើតទិកសគ្រប់ទីឋាន ៗ
នគរនោះឯងដូចផ្កាតា គ្មានក្លិននោះណាពុំកុំផាន
បូរីប្រពៃពុំកប់អាន ដូចព្រះសូរ្យគានបង់រស្មី ៗ

សាសនាបម្រុងក្នុងស្រុកនោះ   កុំបានមានឈ្មោះថោកសារ
ពាបទន់អន់អួនសូនឡងាប់ខ្ញី   ដូចនាងកាកីខាតលាភា ។
ខ្ញុំសូមដាស់តឿនក្រើនកុលបុត្រ   ដ៏វិសេសសុទ្ធកបជ័យ
ត្រូវខំសម្លាប់កោសជា   ដោយវិរិយាគឺឧស្សាហ៍ ។
ត្រូវមានស្នេហាការដែលធ្វើ   ត្រូវខំអើពើរៀនរចនា
ឲ្យបាននោមតើតកើតផលា   បីដូចមាតាស្ន័គ្របុត្រភ្ញា ។
មិនត្រូវត្អូញត្អែរថាទ្បើយហត់   ចិត្តត្រូវសង្កត់រាល់វេលា
ខិតខំរៀនសូត្រតាមមាគ៌ា   ដែលប្រាជ្ញនានាបានត្រេចហើយ ។
ត្រជាក់រង៉ាក្តៅក្តីណា   ត្រូវប្រឹងធ្វើការកុំឲ្យស្បើយ
ខំឲ្យបានដល់យល់កោះត្រើយ   ទើបបានក្តីល្ហើយក្នុងកាយា ។
ធម្មជាតិបុប្ផាផ្កាកូឡាប   តែងក្រាបលូតចេញពីបន្លា
ដូចជារត្នដ៏ថ្លៃថ្លា   កើតពីទុក្ខកាលទិវា ។
សុខតែងកើតក្រោយទុក្ខជានិច្ច   បើសុខសូម្បីលិចកើតភ័យា
គួរកុលបុត្រគ្រប់អង្គា   រេការិះគិតពាក្យនេះណា ។
គិតទៅទីងយល់ស្គាល់តម្លៃ   សុខប្រសើរក្រៃជាងទុក្ខា
បើចង់បានសុខតាំងឧស្សាហ៍   រៀនសូត្រធ្វើការរបរទាំងឡាយ ។
មិនត្រូវនៅដេកត្រេកក្នុងខ្ជិល   ត្រូវចេះរមិលមើលនាយអាយ
យល់ការពាក់ព្រៀងទៅវែងឆ្ងាយ   ទើបបានសប្បាយកាយភិរម្យ ។

ត្រូវមានព្យាយាមឲ្យណាស់សា ឧបមាដូចសត្វធ្វើទ្រនំ
កណ្ដៀវតូចប្រាណមិនបានធំ ពាំដីមកផ្គុំធ្វើគ្រឹះហា ។
តូច ៗ តិច ៗ ប៉ុចដ្គិ ជាដំបូកធំខ្ពស់មហិមា
កើតពីព្យាយាមតាមពណ៌នា គួរជនកុំកខំយ៉ាងហ្នឹង ។
មិនត្រូវគិតណាយស្ដាយកម្លាំង តោងបេះតតាំងរកទីពឹង
រិះរកវិជ្ជាជាខុនទឹង តោងបេះជញ្ជីងប្រើប្រាជ្ញា ។
តោងយល់ថាវិជ្ជាលោកិយ៍ លោកុត្តរក្តីធំណាស់សា
តម្រិះបេះតិចគេបអួតថា បំណេះអាត្មាឥតនរណាស្មើ ។
គិតបែបដូចនេះប្រហែសសល់ ខ្ជិលខឹងមកផ្ដល់ខ្វះដំណើរ
ខ្លួនកិច្ចរៀនតម្រិះប្រសើរ ខានដើរទៅកាន់ភូមិសុខា ។
គំនិតគិតនេះដូចកង្កែប ពួនអែបកន្ទឹកអណ្ដូងណា
សម្គាល់យល់ទីនៃអាត្មា គ្មានវាលធលសាណាស្មើបាន ។
ប្រសិនប្រសព្វឃើញសមុទ្រ គង់តែរន្ធត់ស្ទុតមិនខាន
កង្កែបគង់គិតកិតក្បាក់ប្រាណ មើលឆ្ងាយទីបានរបស់ខ្លួន ។
បើកង្កែបឆ្លាតមានប្រាជ្ញា គង់ទឹងប្រាជ្ញាយ៉ាងសមសួន
ចង់បាននាទីដែលធំធួន បានខ្លួនហែលលេងជាសុខុម ។
ដូចជាកុលបុត្រប្រកបល័ក្ខណ៍ ខំគិតស្វែងស្វាក់ប្រមូលផ្តុំ
ប្រាជ្ញារករៀនវិជ្ជាធំ ត្រៃសេតត្រសុំតាមវេណី ។

តាំងពីព្រលឹមទល់ព្រលប់ ខំរៀនពុំឈប់ខំសឹក
ពិនិត្យធម៌អាថ៌ក្នុងគម្ពីរ ទំយាវកវីគ្មានសម្រាន្ត ៗ
ប្រឹងរៀនវិន័យបច្ច័យសុខ ដែលព្រះពុទ្ធទុកឲ្យគ្រប់ប្រាណ
ស្គាល់ដឹងអាបត្តិទាំងប៉ុន្មាន ដឹងអស់លាក់ហានទោសនានា ៗ
មិនបេះពោលថាអាត្មាចាស់ ឬនៅក្មេងណាស់ក្រគណនា
មិនគួរខំរៀនវិន័យា នាំឲ្យវេទនាលំបាកកាយ ៗ
ពីព្រោះវិន័យច្រើនហើយជ្រៅ ក្រយ៉ាងសន្ទៅទៅវែងឆ្ងាយ
ហត្ថាខ្ចីសល់កុំខ្វល់ខ្វាយ នុនកាយក្រសោបនុបតី ៗ
កុលបុត្រណាពោលពាំនោលនេះ ហៅថាពុំចេះល្ងង់ពេញទី
មើលសត្វស្រមោចលើប្រថពី ជាទីគួរគិតពិចារណា ៗ
ស្រមោចខ្លួនតូចៗពេកសល់ ប្រឹងខំរបល់ពាំអាហារ
ធំៗជាងខ្លួនប៉ុន្មានណា យកទុកប្រើការដល់គ្រាក្រ ៗ
បើពាំពុំរួចអាហារធំ ស្រមោចកុះកុំគ្នាឈ្ងួរ
នាំគ្នាមីម្នារត់ស្រុះស្រួ ទទួលអំណរពាំចំណី ៗ
ដូចពួកកុលបុត្រឧត្តុង្គសក្តិ រៀនអាក់ព្រោះពុំយល់សេចក្តី
ពាក្យក្នុងគម្ពីរបទបាលី នាំគ្នាឃ្លាតខ្ចីប្រឹងវិនិច្ឆ័យ ៗ
សម្រស់សម្រួលផ្ទៀងពិនិត្យ ការកពាក្យពិតពាក្យប្រពៃ
យូរទៅគង់យល់ក្តីសន្ដៃ អរុណោទ័យពេញក្តីថ្លា ៗ

តូច ៗ ផ្គុំគ្នាកើតជាធំ ដូចសូត្រវិញរុំធ្វើខ្សែណា
រឿងនេះខ្ញុំធៀបប្រៀបឧបមា សាមគ្គីបណ្ដាកុលបុត្រ ៗ
ឧស្សាហ៍សង្គ្រោះសន្ដោសគ្នា ចំរើនវិជ្ជាវិសេសសុទ្ធ
ព្យាយាមមាំមួនធួនទាំងមុត គ្មានពុតខូចខិលខ្ជិលក្នុងកាយ ៗ
ប្រទះតម្រិះឧត្តមល្អ បេះបែកបន្តបន្ទក់ផ្សាយ
ដូចមេមាន់ល្អប្រឹងកកាយ បានបាយចំបែកបែកកូនស៊ី ៗ
មិនបេះកំណាញ់ស្បួជាតិ បានហើយវេចវៀតលាក់វក់វី
មិនគិតឲ្យកើតផលសំគី ដូចដីគ្មានដីអាក្រក់សល់ ៗ
កំណាញ់កើតពីខ្ជិលធ្វើទាន ជាទីប្រធានទាំងផ្ដាច់ផ្ដល់
កុំឲ្យយល់យង់វង់កុសល ដូចខ្វាក់ពុំយល់ស្គាល់លោកា ៗ
បើខ្លួនកំណាញ់លាក់តម្រិះ មិនឲ្យគេបេះពីអាត្មា
តម្រិះតម្រាយអន្ដរាយ ខ្លួនស្លាប់កាលណាអសារបាត់ ៗ
ត្រូវយកតម្រាប់ព្រះសម្ពុទ្ធ ជាគ្រូវិសុទ្ធលើបរិស័ទ
ឃើញធម៌ល្អ ៗ ចរក្ដាត់ ទេសនាប្រាប់សត្វគ្រប់ ៗ គ្នា ៗ
ព្រះទ័យមេត្តាសត្វទូទៅ ពុំដែលស្ងៀមនៅ ១ វេលា
ប្រដៅឲ្យចំរើនធម្មា បច្ច័យសួគ៌និព្វាននាយ ៗ
ខ្ញុំប្រែកែពីកោសជៈ ពុំទាន់អស់លក្ខណៈទូលាយ
ឲ្យក្លឹល្អល្អះច្បាស់ពណ្ណកយ សូមជនសម្ដាយអត់ទោសា ៗ

រឿងនេះខ្ញុំតែងតាមគំនិត ខំគិតរំពឹងនឹងបញ្ញា
តាមខន់ពន់ពិតឥតឧបមា សូមទានមេត្តាកុំនិន្ទា ។
គួរមើលពិគ្រោះអស់ពាក្យនេះ បើល្អសូមរិះកន្ទ័យា
កុំឲ្យបាបធម៌គោសជា មកធ្វើជាមារពាធាបាន ។
បើលះខ្ជិលរួចដូចបំណង នេះពេញជាច្បងជនសព្វឋាន
ដូចជាទង់ជ័យអម្បាលមាណ លោកសឹងរាប់អានហៅថាល្អ ។
មានកេរ្តិ៍មានឈ្មោះមានយសសក្តិ មានមាសមានប្រាក់ខ្ញុំកំដរ
ញុំាងតួជញុំាងពង្សវង្សបវរ ញុំាងឲ្យនគរមានបុប្ផា ។
ញុំាងសាសន៍ព្រះពុទ្ធឲ្យប្រពៃ ញុំាងធម៌វិន័យនិងសង្ឃា
សន្តោសប្រោសសត្វគាត់វេក ទុកជាដំណាតទៅអើយ ។



# សេចក្ដីរាយការ អំពីអ្នកតំណាងខេត្តកំពត

## នាំប្រាក់ចំនួន ១.០០០រ មកជូនព្រះរាជបណ្ណាល័យកម្ពុជា

ក្រមការ ជុំ-មៅ ធ្វើរាជការក្នុងព្រះរាជបណ្ណាល័យ អធិប្បាយ

---

នៅថ្ងៃ ២៤ ខែយូកាំងឆ្នាំ ១៩២៩ អ្នកតំណាងខេត្តកំពតមានឃុនរក្សាភិបាល ម៉ក់ មេឃុំ ១ ក្នុំកុង ខណ្ឌតានី ជាប្រធាន មួយអន្លើដោយភិក្ខុសង្ឃចំនួន ៣០ អង្គ និងឧបាសកឧបាសិកាចំនួន ២០០ នាក់ បាននាំប្រាក់ចំនួន ១០០០រ មកជូនព្រះរាជបណ្ណាល័យកម្ពុជា ដើម្បីសុំឲ្យរាជមន្ទីរនេះបោះពុម្ពសៀវភៅចីវរខន្ធកនិងបញ្ចាខន្ធក ចែកជាធម្មទានដល់គ្រប់វត្ត ក្នុងកម្ពុជប្រទេស ។

ក្នុងថ្ងៃនោះឯងព្រះរាជបណ្ណាល័យ បានរៀបចំកន្លែងធំសម្រាប់មើលសៀវភៅ ឲ្យទៅជាកន្លែងទទួលនៃនាក់តំណាងខេត្តតាំងនោះ ។

វេលាម៉ោង ៤ រសៀលអស់លោកកុង្សីយសេនាបតី អ្នកគ្រប់គ្រងព្រះរាជបណ្ណាល័យនឹងនាហ្មឺនសព្វមុខមន្ត្រីខ្លះ មានសម្ដេចចៅហ្វាកាំងវរវៀងជ័យជាអធិបតី បានអញ្ជើញមកជួបជុំក្នុងទីព្រះរាជបណ្ណាល័យកម្ពុជា ដើម្បីតាំងទទួលឲ្យពរសព្វសាធុការដល់អ្នក ដែលនាំអំណោយដ៏ប្រសើរនេះមក ហើយដើម្បីនឹងញុំាងសេចក្ដីជ្រះថ្លាក្នុងបុញ្ញកម្មនេះ ឲ្យរឹងតែចម្រើនឡើងទៀត ។

ព្រះសង្ឃទាំង ២ គណៈក្នុងក្រុងភ្នំពេញ ក៏បាននិមន្តមកជាច្រើនអង្គ តាមសេចក្ដីនិមន្តរបស់ក្រសួងសង្ឃការី ។

លុះអ្នកតំណាងខេត្តបានចូលដល់មកជួបជុំ ក្នុងព្រះរាជបណ្ណាល័យ ហើយ ឃុនរក្សាភិបាលម៉ក់ជាតំណាង ក៏បាននាំប្រាក់ចំនួន ១.០០០រ តម្កល់លើជើងពានដាក់ចុះលើតុ ១ ចំពោះមុខអស់លោកកុងស៊ុយសេនាបតី និងអ្នកគ្រប់គ្រងព្រះរាជបណ្ណាល័យ ក្នុងវេលានោះឯង សម្ដេចចៅហ្វាវាំងវរវៀងជ័យ ក៏បានឲ្យពរសព្ទសាធុការ ដល់អ្នកតំណាងខេត្តទាំងអស់ សូមឲ្យបានប្រកបដោយកុសលរាសី និងគុណសម្បត្តិ គ្រប់ប្រការគ្រប់ៗ គ្នាតរៀងទៅ ។

លុះចប់ពរសព្ទសាធុការហើយ ឃុនរក្សាភិបាល ម៉ក់ ក៏តាំងសូត្រនូវសុន្ទរកថាដែលជាសេចក្ដីពណ៌នាអំពីសេចក្ដីជ្រះថ្លាក្នុងព្រះពុទ្ធសាសនា ចំពោះមុខអស់លោកកុងស៊ុយសេនាបតី អ្នកគ្រប់គ្រងព្រះរាជបណ្ណាល័យ នាហ្មឺនសព្វមុខមន្ត្រីនិងព្រះសង្ឃទាំង ២ គណៈ ដែលជួបជុំក្នុងទីនេះ ថាដូចនេះ ។

សុន្ទរកថារបស់ឃុនរក្សាភិបាលម៉ក់

សូមក្រាបបង្គំទូល សូមក្រាបប្រតិបត្តិទ្រង់ និងលោកឡឺរេស៊ីដង់ស៊ុបេរីយើរ និងព្រះបាទម្ចាស់ សូមទ្រង់ជ្រាប សូមទានជ្រាប ។

ដ្បិតទូលព្រះបង្គំជាខ្ញុំៗ ព្រះបាទម្ចាស់ទាំងអស់គ្នា ព្រមទាំងព្រះភិក្ខុសង្ឃសាមណេរទាំងឡាយក្នុងខេត្តកំពត មានគំនិតយល់ឃើញថា

គាំទពីដួចព្រះករុណាជាអម្ចាស់ជីវិត ព្រមទាំងរាជការប្រតិកតួក៏គ័កុងក្រុង កម្ពុជាធិបតី ដែលបានជំនុំព្រមទាំងអស់លោកព្រះបាទម្ចាស់ជាកុងវៀយ សេនាបតី បានបង្កើតឲ្យមានព្រះរាជបណ្ណាល័យនេះឡើង នោះយើងខ្ញុំ ទាំងអស់គ្នាសឹងមានសេចក្ដីចម្រើនដោយការចេះដឹង ស្គាល់ផ្លូវប្រតិបត្តិ ក្នុងព្រះពុទ្ធសាសនាបានយល់ក្លីច្បាស់លាស់ជាងអំពីដើមនេះ គឺអាស្រ័យ សៀវភៅបោះពុម្ពជាគម្ពីរព្រះពុទ្ធសាសនានិងសុភាសិតផ្សេង ៗ ដែលជា គុណសម្បត្តិ របស់ព្រះរាជបណ្ណាល័យ ផ្សាយចេញឲ្យអស់យើងបាន រៀនសូត្រ ។ យើងខ្ញុំយល់ឃើញតមកទៀតថា គួរតែយើងមាន សេចក្ដីខ្វល់ខ្វាយជួយឧបត្ថម្ភបំពេញព្រះរាជបណ្ណាល័យ ឲ្យរឹងរឹតតែមាន សេចក្ដីចម្រើនរុងរឿង រីកផ្សាយធំទូលាយឡើងទៀត ប៉ុនអម្បាលយើង រាល់គ្នាចំណាយប្រាក់កប់រយ រាប់ពាន់ កសាងការកុសល មានសង់វិហារ សាលា កុដិ និងបុណ្យកឋិន បុណ្យបញ្ចុះសីមាជាដើម ម៉េចយើងអាចនាំ គ្នាធ្វើរៀង ៗ មកបាន ព្រោះយើងជឿជាក់ថា ធ្វើរួចហើយនិងបាន ផលបុណ្យជាកំណប់ទ្រព្យរបស់យើងជាប្រាកដ ។ ក៏ដូចជាព្រះរាជបណ្ណា ល័យ ជាឃ្លាំងសម្បត្តិដ៏ប្រសើរ គឺជាឃ្លាំងគម្ពីរសាស្ត្រាក្បួនច្បាប់ជា កន្លែងលំនៅនៃចំណេះវិជ្ជា ជាសម្រាប់ឥស្សរជន នូវអស់ប្រជាជនទាំង ឡាយក្នុងព្រះនគរ ជារបស់យើងៗ មិនគួរភ្លេចនឹកមិនឃើញនោះឡើយ យើងគួរតែជួយបំពេញ ដោយការបរិច្ចាគធនធានបន្តិចៗ ម្នាក់ តាមសម គួរដល់ទ្រព្យសម្បត្តិនិងសទ្ធារបស់យើង ហើយនាំយកមកជាក់ក្នុងព្រះ

រាជបណ្ណាល័យ ដើម្បីនឹងជួយឲ្យព្រះរាជបណ្ណាល័យកាន់តែមានកម្លាំងរឹងប៉ឹងឡើង នឹងបានបោះពុម្ពសៀវភៅដែលជាគម្ពីរក្បួនច្បាប់ក្នុងព្រះពុទ្ធសាសនា ហើយផ្សាយចេញឲ្យបានចម្រើនផ្លូវចេះដឹងដល់អស់យើងរាល់គ្នា ឲ្យបានក្រៃលែងជាងសព្វថ្ងៃនេះឡើងទៀត ។

ព្រោះហេតុដូចមានសេចក្តីខាងលើនេះ ទូលព្រះបង្គំជាខ្ញុំៗព្រះបាទម្ចាស់ទាំងអស់គ្នាបានព្រមព្រៀងគ្នាចេញប្រាក់រាល់ខ្លួនបន្តិច ៗ ម្នាក់ដោយសេចក្តីស្រុះស្រួលបានជាប្រាក់ចំនួន ១.០០០ រៀល នាំយកមកដាក់ក្នុងព្រះរាជបណ្ណាល័យនេះ ដោយលោកឡូរេស៊ីដង្ត និងលោកចៅហ្វាយខេត្តរបស់យើងខ្ញុំ ក៏មានសេចក្តីយល់ព្រមជាមួយនឹងអស់យើងខ្ញុំផង ។ ប្រាក់ចំនួនមួយពាន់រៀលនេះ យើងខ្ញុំសុំឲ្យព្រះរាជបណ្ណាល័យចាត់ចែងបោះពុម្ពជាសៀវភៅ ព្រះវិន័យបព្វជាខន្ធកសម្រាយប្រែចេញពីបាលីវិន័យបិដកសេចក្តីពិស្តារឲ្យយើងខ្ញុំ ហើយសុំឲ្យព្រះរាជបណ្ណាល័យ ចែកផ្សាយប្រគេនដល់លោកគ្រូចៅអធិការគ្រប់វត្តក្នុងក្រុងកម្ពុជាឲ្យយើងខ្ញុំ ពីព្រោះព្រះវិន័យនេះសព្វថ្ងៃនៅខាតមិនទាន់មានរាល់វត្តនៅឡើយ ។ ក្រែងប្រាក់នេះចំនួនតិចនឹងអាចបោះពុម្ពជាសៀវភៅចំនួនច្រើនមិនបាន នោះសុំឲ្យព្រះរាជបណ្ណាល័យជួយបំពេញ ហើយព្រះរាជបណ្ណាល័យចំណាយសៀវភៅដែលលើសអំពីចំនួនត្រូវចែកនោះ ជាប្រយោជន៍សេចក្តីចម្រើនក្នុងព្រះរាជបណ្ណាល័យចុះ ។ តែតាមសេចក្តីពេញចិត្តរបស់យើងខ្ញុំ ៗ មានសេចក្តីចំណង់ថា បើជាមានទំនងស្រួល គឺថាបើយើងខ្ញុំអស់គ្នាអាចនឹង

រិះរកលៃលកបាន នោះយើងខ្ញុំនឹងបេះតែនាំគ្នាត្បៀតចេញប្រាក់បន្តិចៗម្នាក់តាមកម្លាំងធនធាន ដូចទំនងយើងខ្ញុំនាំគ្នាធ្វើកុងត្រានេះ តរៀងៗទៅទៀត ជាធម្មទានទុកជាកំណប់ទ្រព្យដ៏ប្រសើររបស់យើងខ្ញុំទាំងអស់គ្នា ។

សូមទេវតាទាំងឡាយ ទទួលអនុមោទនាត្រេកអរ ចំពោះផលនិសង្សនៃធម្មទានរបស់យើងខ្ញុំនេះ ។

ដោយអានុភាពនៃធម្មទាននេះ សូមឲ្យមហានគរបារាំងសែសមានសេចក្ដីចម្រើន ។

សូមឲ្យព្រះនគរក្រុងកម្ពុជាធិបតីមានសេចក្ដីចម្រើនៗ សព្វៗ កាលទៅហោង ។

លុះសូត្រចប់វេលាណា សម្ដេចចៅហ្វាវាំងវរវៀងជ័យ ក៏ថ្លែងសេចក្ដីអំណរគំណាងព្រះករុណាជាអម្ចាស់ជីវិតលើត្បូង នឹងលោកឡឺរេស៊ីដង្តសុបេរីយើរ សរសើរនូវបុញ្ញកម្មនេះថាជាអំពើដ៏វិសេសថ្លៃថ្លា នឹងបានជាតម្រាប់ដំបូន្មានដល់ជនទាំងឡាយក្នុងកម្ពុជរដ្ឋ ព្រមទាំងសរសើរអំពីសេចក្ដីយល់ត្រូវរបស់យុវក្សាកិបាលម៉ក់ដែលជាមេគិតផ្ដើមឡើង ដោយចេតនាជាញាណសម្បយុត្ត អាចញុំាងមិត្រភក្តិទាំងប៉ុន្មានក្នុងខេត្តកំពតឲ្យយល់ត្រូវតាម ហើយចូលជួយដោយភាគតិចច្រើនតាមកម្លាំងធនធានបានជាសាច់ប្រាក់ ១.០០០៛ នេះ យកមកជួយកម្លាំងព្រះរាជបណ្ណាល័យកម្ពុជា ឲ្យបានតៃតែរឹងប៉ឹងឡើង សរសើរអំពីសៀវភៅចរក្ខុក ទិន

បព្វជាខ្ទួក ដែលសុំឲ្យព្រះរាជបណ្ណាល័យបោះពុម្ពផ្សាយ ជាសៀវភៅដ៏មានប្រយោជន៍ក្រៃលែងក្នុងព្រះពុទ្ធសាសនា ព្រោះជាក្រិត្យវិន័យរបស់ភិក្ខុសាមណេរ ដែលមានក្នុងព្រះវិន័យបិដកជាងមូល គឺជាច្បាប់ដែលអាចញុំាងអ្នកបួសឲ្យស្គាល់ខុសត្រូវក្នុងការប្រើប្រាស់នូវត្រៃចីវរ និងបព្វជាក្នុងព្រះពុទ្ធសាសនា ដោយហេតុថា បើបព្វជិតទាំងឡាយប្រព្រឹត្តព្រះវិន័យដោយហ្មត់ចត់ដរាបណា ព្រះពុទ្ធសាសនាក៏អាចចម្រើនថ្កុំថ្កើងឋិតថេរទៅដរាបនោះ ។

លុះសម្តេចចៅហ្វា បានថ្លែងសេចក្តីសរសើរនូវបុញ្ញកម្មនេះ ជាស្រេចហើយ ព្រះសង្ឃទាំង ២ គណៈ ដែលបាននិមន្តមកជួបជុំក្នុងទីនោះ ក៏តាំងសូត្រជយន្តោដែលជាធម៌ចម្រើននូវជ័យមង្គល ព្រម ៗ គ្រប់ព្រះអង្គក្នុងវេលានោះ ជាទីញុំាងបណ្តាជនប្រុសស្រីទាំងប៉ុន្មានឲ្យសម្រេចចិត្តជ្រះថ្លាក្នុងបុញ្ញកម្មនេះដ៏ក្រៃលែង លុះចប់ធម៌វេលាណា ទាំងអស់គ្នាក៏លើកដៃប្រណម្យឡើង ទទួលអនុមោទនាថា សាធុ ព្រម ៗ គ្នាក្នុងវេលានោះ ។

ស្រេចហើយ ទើបអស់លោកកុងស៊ុយសេនាបតី និងនាហ្មឺនសព្វមុខមន្ត្រី អញ្ជើញត្រឡប់ទៅតាមផ្លូវទឹក មួយអន្លើដោយព្រះសង្ឃនិងបណ្តាជនប្រុសស្រីទាំងប៉ុន្មាន ដែលបាននិមន្ត បានអញ្ជើញមកកាន់ទីបុណ្យនោះ ។

ការកុសលរបស់អ្នកតំណាងខេត្តកំពត ដែលមានឃុនរក្សាភិបាល

ម៉ក់ជាអធិបតី មិនទាន់អស់តែត្រឹមនេះនៅឡើយទេ នៅមានការកុសលម្យ៉ាងទៀត ដែលមិនមែនមានផលតិចច្រើនជាងគ្នាប៉ុន្មាន ហើយដែលខ្ញុំត្រូវការយកមកនិយាយរៀបរាប់ជា ១ គ្នាផង ព្រោះការកុសលនេះឯងជាប់គ្នាពីការដែលទើបនឹងពោលហើយនេះ ខុសគ្នាតែការដែលពោលហើយ គឺនាំនូវហិរន្យវត្ថុ មកតម្កល់ក្នុងព្រះរាជបណ្ណាល័យនាក្រុងភ្នំពេញ ហើយឯបុញ្ញកម្មដែលខ្ញុំនឹងអធិប្បាយតទៅនេះ គឺនាំយកសៀវភៅព្រះត្រៃបិដកជាអក្សរសៀម និងព្រះសារីរិកធាតុតម្កល់ដោយព្រះស្តូបមាស និងប្រាក់ពីក្រុងភ្នំពេញទៅតម្កល់ទុក ជាចារិកព្រះពុទ្ធសាសនាក្នុងវត្តប្រាសាទ ឃុំភ្នំកុង ស្រុកតានី ខេត្តកំពតវិញ ។

ឃុនរក្សាភិបាលម៉ក់ដែលជាមនុស្សចំណាន ១ ខាងធ្វើការជាកុសល បានផ្តើមធ្វើបុញ្ញកម្មលើកទី ២ នេះយូរមកហើយ គឺបានជាវសៀវភៅព្រះត្រៃបិដក (ព្រះសូត្រ, ព្រះវិន័យ, ព្រះអភិធម្ម) ១ ចប់ ចំនួន ៤៥ សៀវភៅនិងទូឈើ ១ ជាយូរហើយ យកមកផ្ញើទុកនៅក្រុងភ្នំពេញ នាទីកុដិលោកព្រះគ្រូវិមលបញ្ញា អ៊ុម-ស៊ូរ អាចារ្យក្នុងព្រះរាជបណ្ណាល័យកម្ពុជា ដើម្បីចាំបានឱកាសដែលនឹងនាំហិរញ្ញវត្ថុមកជូនព្រះរាជបណ្ណាល័យ និងដង្ហែយកទៅតម្កល់ទុកក្នុងវត្តប្រាសាទ ដើម្បីសម្រួលដល់ការសិក្សារបស់ភិក្ខុសាមណេរដែលជាអ្នករៀនសូត្រ រីឯព្រះសារីរិកធាតុដែលបានមកជាយូរហើយនោះ ទើបនឹងជួលជាងធ្វើព្រះស្តូបដោយមាស និង

ប្រាក់ ដើម្បីតម្កល់ជាទីបូជាគោរព ដង្ហែទៅជាមួយនឹងព្រះត្រៃបិដក នោះ ។

លុះបានឱកាសនាំនូវហិរញ្ញវត្ថុមកក្នុងថ្ងៃ ២៦ យ៉ាងនេះ ក៏តាំងចាប់ផ្ដើមបុញ្ញកម្មលើកទី ២ នេះ នៅវេលាបន្ទាប់តគ្នាពីកាលលើកមុន គឺថាបាននិមន្តព្រះត្រៃបិដកនិងព្រះសារីរិកធាតុមកតម្កល់ជាបណ្ដោះអាសន្ន ក្នុងទីព្រះរាជបណ្ណាល័យ ហើយវេលាម៉ោង ៧ កន្លះយប់ ក្នុងថ្ងៃជាមួយ បាននិមន្តធម្មកថិក ២ អង្គ សម្ដែងធម៌ទេសនា ក្នុងព្រះរាជបណ្ណាល័យកម្ពុជា គឺលោកគ្រូព្រះញាណបវរវិជ្ជា ឯម ចាងហ្វាងសាលាបរិយត្តិជាន់ខ្ពស់ ១ និងលោកព្រះគ្រូសង្ឃវិជ្ជា តាត អាចារ្យបង្រៀនភាសាសំស្ក្រឹត ក្នុងសាលាដដែល ១ ក្នុងវេលាដែលរៀបចំសម្ដែងធម៌ទេសនានោះព្រះរាជបណ្ណាល័យដែលជាមន្ទីរដ៏ធំទូលាយ ក្លាយទៅជាមន្ទីរយ៉ាងតូច ១ វិញ ព្រោះក្នុងគ្រានោះមនុស្សដែលត្រូវការស្ដាប់ធម៌ទេសនា ទាំងអ្នកបួសទាំងគ្រហស្ថ ទៅជួបជុំណែនតាន់តាប់ជ្រៀតមិនចុះ សល់នៅខាងក្រៅជាច្រើន ព្រោះព្រះថេរៈដែលជាធម្មកថិកទាំង ២ អង្គនេះ សុទ្ធតែល្បីល្បាញបេះចាំនូវធម៌វិន័យយ៉ាងស្ទាត់មុតមាំ ជាទីញុំាងបណ្ដាជនប្រុសស្រីឲ្យចង់ស្ដាប់ដោយក្រៃលែង អាស្រ័យហេតុនេះហើយ ទើបក្នុងយប់នោះ ឃើញមានមនុស្សដែលចូលមិនចុះ ឈរអង្គុយតាន់តាប់នៅខាងក្រៅជញ្ជាំងខ្លះក៏ទំឡើងលើបង្អួចបន្ទើតឡើងឲ្យតែបានស្ដាប់ ឥតគិតដល់សេចក្ដីនឿយព្រួយ

ល់ភ្ញាកឡើយ ។

ព្រះថេរទាំង ២ អង្គក៏តាំងៈហាទឆ្លើយនូវអាថ៌ប្រស្នាផ្សេងៗ យ៉ាងក្បោះក្បាយកណ្ដាលមហាសន្និបាត ដើម្បីកម្ចាត់នូវវិមតិសង្ស័យនៃមហាជនទាំងឡាយ ដែលអង្គុយប្រណម្យតាំស្ដាប់ដោយស្ងាត់ជ្រៀប ឥតមានប្រែប្រួលឆ្វេងស្ដាំ ប្រុងស្មារតីត្រងត្រាប់នូវរសព្រះសទ្ធម្មទេសនាតែរៀងខ្លួន លុះដល់ម៉ោង ១២ អធ្រាត្រ ព្រះធម្មកថិកទាំង ២ ព្រះអង្គក៏បង្ហួចនូវធម៌ទេសនាព្រោះសមគួរដល់កាលវេលាតែប៉ុណ្ណោះ ទឹងទ្រទ្រាំតទៅទៀតមិនបាន រីឯអ្នកស្ដាប់ទាំងអស់គ្នា ស្ទើរតែមិនចង់ក្រោកចេញក្នុងវេលានោះ ព្រោះមានសេចក្ដីស្ដាយដោយស្ដាប់មិនទាន់ឆ្អែត ។

កាលណាព្រះភិក្ខុសាមណេរ និងបណ្ដាជនប្រុសស្រីវិលត្រឡប់ទៅលំនៅវិញទីទៃ ៗ គ្រប់រូបហើយ បានចាត់ការរៀបចំព្រះរាជបណ្ណាល័យ ដើម្បីឲ្យអ្នកតំណាងខេត្តកំពតសំណាក់ក្នុងរាត្រីនោះ គឺបានរៀបបន្ទប់ខាងជើងសម្រាប់លោកសង្ឃ ហើយបន្ទប់ធំដែលជាកន្លែងទេសនាសម្រាប់ឧបាសកឧបាសិកា ទំរាំព្រឹកឡើងវេលាណាទឹងត្រឡប់វិលទៅក្នុងខេត្តកំពតវិញ ។

លុះព្រឹកស្អែកឡើងនាថ្ងៃ ២៥ យូហាំង ឆ្នាំ ១៩២៩ វេលាម៉ោង ៧ អ្នកតំណាងខេត្តក៏តាំងរៀបចំនិមន្តព្រះត្រៃបិដកដែលដាក់ក្នុងទូ យកទៅតម្កល់ក្នុងថេយន្តមួយអន្ទើទឹងព្រះស្តូបដែលតម្កល់ព្រះសារីរិកធាតុ ស្រេច

ហើយរថយន្តក៏បរតាមផ្លូវសំដៅឆ្ពោះកាន់ឃុំភ្នំកុង ស្រុកតាឌី ក្នុងគ្រានោះឯង ដើម្បីទឹងដង្ហែចូលក្នុងវត្តប្រាសាទ នៅវេលាម៉ោង ៣ រសៀលក្នុងទិវានោះ ។

ឯអ្នកស្រីក្រមុំការប៊ីឡែស ដែលជាបណ្ណារក្សនៃព្រះរាជបណ្ណាល័យកម្ពុជា ក៏បានអញ្ជើញទៅកាន់បុណ្យនោះដែរ ដោយយុនរក្សាភិបាលម៉ីក និងអ្នកតំណាងខេត្តកំពតទាំងអស់គ្នាបានសូមឲ្យអញ្ជើញទៅ តែបានចេញពីភ្នំពេញក្នុងពេលក្រោយ គឺម៉ោង ១១ កន្លះថ្ងៃជាមួយ ។

យើងមានសេចក្តីសង្ឃឹមថា របៀបបុណ្យដែលរៀបចំដង្ហែចូលក្នុងវត្តប្រាសាទនោះនឹងថ្កុំថ្កើងរុងរឿងល្អ គួរជាទីជ្រះថ្លាដល់ម្ចាស់ទានពន់ពេកណាស់ ហើយនឹងបានជាទីស្ងើចនិងជាគម្រាប់ដល់មនុស្សជាតិប្រុសស្រីដែលមិនទាន់បានធ្វើនូវបុញ្ញកម្មនេះ ។

ទីបំផុតនេះ យើងសូមបួងសួងគស់ទេពនិករទាំង ១ ហ្នឹងលោកធាតុដែលមានញាណទិព្វសូមឲ្យពរសព្វសាធុការនិងចម្រុងចម្រើនដល់អ្នកតំណាងខេត្តកំពតទាំងអស់គ្នា មានយុនរក្សាភិបាលម៉ីក ជាពាទិសុរាក-ធិបតី ដែលមានសេចក្តីជ្រះថ្លាដ៏ប្រសើរ បានធ្វើអំពើយ៉ាងវិសេសនេះឲ្យបានសេចក្តីសុខសេចក្តីចម្រើនគ្រប់ ៗ កាលទៅហោង ។

